សារព័ត៌មាន ខ្មែរផុស ស.រ.អា

# KhmerPost USA

E-mail: info@khmerpost.us / Website : khmerpost.us
Advertising: 978-656-8141/ Hotline news: 978-942-1641

មាតិការរឿង

Issue 158 July 30th- Aug 12th, 2014

Free



New Office: Tel: (978) 677-7163 Fax: (978) 677-7092
45 Merrimack St. Suite 218A Lowell, MA 01852

## ការវិវត្តន៍ថ្មីនៃនយោបាយកម្ពុជា

**បទវិភាគនយោបាយខ្មែរផុសស.រ.អា**

**ដោយ : ពិន សំខុន**

ថ្ងៃទី១៥កក្កដា២០១៤ **តទៅទំព័រទី ២១**



## ជ្រួលច្របល់នៅ ម៉ាឃីត បាស់ឃីត

## Boycott at Market Basket

**ដោយ : សុខា**

**ក្រុងធីកសបឺរីរដ្ឋម៉ាសាឈូសេត** : ហាងលក់គ្រឿងឧបភោគបរិភោគហាណាហ្វត មានមនុស្សចេញចូលទិញទំនិញកកកុញខុសសព្វមួយដង កាលពីថ្ងៃចន្ទ ទី២១ ខែកក្កដា ឆ្នាំ២០១៤។ យោបល់ពីអ្នកទិញម្នាក់ដែលកំពុងបង់លុយទិញអាហារពីហាងហាណាហ្វតសាខាធីកសបឺរីនោះ បាននិយាយថា បើអ្នកមានទឹកចិត្តមែនអ្នកប្រាកដជាមិនចូលទិញម្ហូប **តទៅទំព័រទី ០៨**




**ព័ត៌មានខ្លី**

## អតីតយុទ្ធជនបានត្រូវអាមេរិកទទួលស្គាល់

**ដោយ : ប៉ាកស៊ុយគ្រី**

សភាអាមេរិកាំង ទើបនឹងអនុម័តច្បាប់ថ្មី មួយកាលពីថ្ងៃទី២៤ កក្កដា ឆ្នាំ២០១៤ ដែលទទួលស្គាល់យុទ្ធជនខ្មែរថា **តទៅទំព័រទី ០៤**




សមាគមអតីតយុទ្ធជនខ្មែរនៅហ្វីឡាដែលហ្វៀ

# ពិធីបុណ្យប្រជាជនឆ្នាំ២០១៤ នៅឡូវែល
# Lowell Folk Festival 2014







**អត្ថបទដោយ : រីឆាដ ហាវ**

**ប្រែសម្រួលជាខេមរភាសាដោយ : សុខា**

ចុងសប្តាហ៍ចុងក្រោយនៃខែកក្កដា រៀងរាល់ឆ្នាំ រាប់ចាប់តាំងពី២៨ឆ្នាំមុនទស្សនីយភាពសម្លេង រសជាតិ និងក្លិនដែលចេញពីគ្រប់ជ្រុងនៃពិភពលោកត្រូវបានប្រមូលផ្តុំគ្នានៅទីកន្លែងមួយនៃទីប្រជុំជនក្រុងឡូវែលតាមរយៈការប្រារព្ធកម្មវិធីនៃពិធីបុណ្យប្រជាជននៅឡូវែល។ កម្មវិធីនេះចាប់ផ្តើមដោយព្យុះហយាត្រាធំមួយដឹកនាំដោយក្រុមតន្ត្រី និងប្រជាជនពីគ្រប់ទិសទីនៃឡូវែលដែលកាន់ទង់ជាតិនៃប្រទេសដើមកំណើតរបស់ពួកគេ។ ទន្ទឹមនឹងភាពសប្បាយរីករាយតាមរយៈតន្ត្រីការហែក្បួនអ្នកចូលរួមក៏មានឱកាសភ្លក្សរសជាតិនៃម្ហូបរបស់ជាតិសាសន៍នានាមានម្ហូប ហ្វីលីពីន ណាយជីរៀ ថៃ ជាដើម។

ឆ្នាំនេះ ក្រុមតន្ត្រីស្គររបស់សាសន៍ជប៉ុនអញ្ជើញមកពីសាន់ហ្វ្រាន់ស៊ីស្កូដែលមានឈ្មោះថា ក្រុមតន្ត្រី សេអ៊ីជិ ថាណាកា សាន់ហ្វ្រាន់ស៊ីស្កូ ថាអ៊ីកុ ដូចុ។ ស្គរដែលយកមកលេងនោះ ត្រូវបានបង្កើតនិងច្នៃឡើងកាលពី២000ឆ្នាំមុន។

ភាពសប្បាយរីករាយ និងចំណូលចិត្តដែលប្រជាជនមកចូលរួមក្នុងកម្មវិធី គឺការដើរកំសាន្តសប្បាយជុំវិញក្រុង ហូបចំណីអាហារ ស្តាប់តន្ត្រី និងទិញវត្ថុដែលតាំងលក់នានាក្នុងក្រុង។

កម្មវិធីបុណ្យប្រជាជនជាបុណ្យមួយក្នុងចំណោមបុណ្យចម្បង៧ដែលជាមូលហេតុនាំឱ្យឡូវែលជាទីកន្លែងពិសេសក្នុងការរស់នៅ !

**by Richard P. Howe Jr**

On the last weekend of July in each of the past 28 years, the sights, sounds, tastes and smells from every corner of the world come to downtown with the Lowell Folk Festival. Starting with a big parade led by a visiting band and people from Lowell carrying the flags of their ancestral countries, the Festival begins with an outdoor concert on Friday night at Boarding House Park and continues on Saturday and Sunday afternoon and evening. With performances stages

**Continued to page 05**

# ពិធីបុណ្យទទួលអាហារ និងស្រាទំពាំងបាយជូ ទី៨ និង៩ សីហា ២០១៤

## MIDSUMMER DREAMS
## First annual Food and Wine Festival at Lucy Larcom Park, Lowell

ពិធីបុណ្យទទួលទានអហារ និងស្រាទំពាំងបាយជូនឹងប្រព្រឹត្តនៅចំកណ្តាលក្រុងឡូវែលនៅទីតាំងសួន លូស៊ី ឡាកុំផាក ដែលនឹងធ្វើឡើងនៅថ្ងៃទី៨-៩ ខែសីហា ឆ្នាំ២០១៤ ផ្តល់ឱកាសដល់លោកអ្នកទទួលនូវរសជាតិឆ្ងាញ់ពិសារនៃម្ហូបអាហារដែលមានក្នុងភោជនីយដ្ឋានទាំងឡាយក្នុងក្រុងឡូវែលរួមនឹងការទទួលទានស្រាក្រហមនិងស្រាបៀក្នុងតំបន់នេះផងដែរ។ ពិធីបុណ្យនេះនឹងមានកម្មវិធីដូចជាការដង្ហែអាហារលើឡានការភ្លក្សស្រាផ្ទាប់ក្នុងស្រុកការពិសារអាហារនៅភោជនីយដ្ឋានក្នុងក្រុងការបង្ហាញការធ្វើមុខម្ហូបភ្លក្សស្រាទំពាំងបាយជូ ការសម្តែងចម្រុះពាក់កណ្តាលរដូវក្តៅ និងការសាកល្បងបង្ហាញចង្កៀងម៉ាំងសុងសុបិន្តទូទាំងក្រុងផងដែរ។

Lowell, MA– The Lowell Food and Wine Festival will be taking place on August 8-9, 2014 Presented by One 27 Global, a local organization create events with vision to build community and to raise poverty awareness. Featuring tastings, culinary journeys, cooking demonstrations, entertainment, and more over the course of two days, this year's Festival will showcase the expertise of Greater Lowell's best culinary, wine and beer leaders.

"We're excited about presenting the 2014 program, with a roster of events that brings an amazing energy to the weekend", noted Tobias Marx , One 27 Global and Founder and Director. "This year's Festival will serve up some of the finest cuisine from the Greater Lowell Area, paired with specially selected wines from the portfolio of Tutto Bene Wine Cellars, and craft beers from the Merrimack Valley Distributing Company's portfolio."

The Festival will include events like:



- Food Truck Journey
- Craft Beer Tasting
- Culinary Journey with local restaurants
- Cooking Demonstrations
- Exclusive Wine Tasting
- MidsummerVariety Show, featuring talent within the Lowell community
- The launching of hundreds of Dream Lanterns over the city

"We will transform Lucy Larcom Park in downtown Lowell into a whimsical reality where dreams come alive for the entire city" says Rachel Napear, who is leading the Festival committee. Napear continues, "The Festival is not only a celebration of a diverse culinary scene. This is a celebration of the hard work and dedication of community organizations assisting its members in achieving their dreams."

The festival is a preview of Greater **Continued to Page 23**




# សារព័ត៌មានខ្មែរផុសសហរដ្ឋអាមេរិក រៀបចំកម្មវិធី ជជែកពិភាក្សាតទល់មុនពេលបោះឆ្នោតជ្រើសរើស តំណាងប្រចាំខណ្ឌមីដដលសិក លេខ១៨

កិច្ចពិភាក្សានេះនឹងធ្វើឡើងនៅថ្ងៃអង្គារ ទី១៩ ខែសីហា ឆ្នាំ២០១៤ វេលាម៉ោង៧យប់ នៅទីស្នាក់ទូរគមនាគមន៍ឡូវែល ឬហៅកាត់ថា អិល ធី ស៊ី ដែលស្ថិតនៅអាស័យដ្ឋាន២៤៦ Market Street ក្នុងក្រុងឡូវែល ។ កិច្ចពិភាក្សានេះ នឹងចាក់ផ្សាយផ្ទាល់ក្នុងទូរទស្សន៍ខ្សែកាបឡូវែល និងផ្សាយបន្តផ្ទាល់នៅលើគេហទំព័រ www.ltc.org ។

ខណ្ឌមីដដលសិកលេខ១៨ មានវិសាលភាពដោយរាប់ទាំង អេកឃឺ និង ហៃឡែន នៃក្រុងឡូវែលផងដែរ ។

បេក្ខជនទាំងប្រាំរូបដែលកំពុងឈរឈ្មោះសម្រាប់ការបោះឆ្នោតបឋម មាន ប្រាយអិន ដូណូវ៉ាន (Brian Donovan) ចេមស៍ លារី (James Leary) រ៉ាឌី ម៉ម (Rady Mom) ដេវីដ អ៊ូលេត (David Ouellette) និង ផល រដ្ឋា យ៉ែម (Paul Ratha Yem) ។

សម្រាប់ព័ត៌មានបន្ថែមអំពីកិច្ចពិភាក្សា សូមទាក់ទង **សុបិន្ត ពិន** សហអគ្គនាយកគ្រប់គ្រង: អ៊ីម៉ែល sobenpin@khmerpost.us ឬ តាមទូរស័ព្ទ **978-656-8141** (ទូរស័ព្ទដៃ) ឬ **978-677-7163** (ការិយាល័យ)

# PRESS RELEASE

## KhmerPost USA to Host State Representative Debate

The KhmerPost USA will host a debate for the candidates for the Democratic nomination for the 18th Middlesex Representative District on Tuesday, August 19, 2014 at 7:00 p.m. at Lowell Telecommunications Corporation at 246 Market Street in Lowell. The debate will be televised live on Lowell cable TV and will be streamed live on www.ltc.org.

The 18th Middlesex District includes the Acre and Highlands neighborhoods of Lowell. The seat was previously held by Kevin Murphy who resigned earlier this year when he was elected Lowell City Manager.

**Candidates in the Democratic Primary are Brian Donovan, James Leary, Rady Mom, David Ouellette and Paul Ratha Yem.**


JimLeary


DaveOuellette


Paul Ratha Yem


Brian Donovan


Rady Mom

The KhmerPost USA is a community newspaper published biweekly in Lowell, Massachusetts and distributed in Cambodian-American communities throughout the East Coast of the United States. Founded in 2008 by Roger Samkhon Pin, the former President of the Cambodian Journalist Association of Cambodia (1994-1997) and the former Director of Radio Free Asia's Cambodian Services.

For more information about the debate, contact Soben Pin, Managing Partner of KhmerPost USA via email sobenpin@khmer-post.us or direct number at **978-656-8141 (cell) | 978-677-7163 (office)**

# ជួបជាមួយង៉ោ គិមជាង នឹង រីទ្ធី អ៊ិង នៃគណបក្សសង្គ្រោះជាតិ

**ខ្មែរផុសស.រ.អា**

នាឱកាសមុនចេញដំណើរ១ថ្ងៃទៅកាន់កម្ពុជា ថ្ងៃទី២៣កក្កដា២០១៤ លោក ង៉ោ គីមជាន អ្នកដំណាងរាស្ត្រមណ្ឌលកំពុងឆ្នាំងនៃគណបក្សសង្គ្រោះជាតិទៅពីឡូវែលសហរដ្ឋអាមេរិកបានផ្តល់នូវការពន្យល់ពីស្ថានភាពនយោបាយកម្ពុជា ចូលរួមដោយលោក អ៊ុន រីទ្ធី អតីតក្រុមប្រឹក្សាក្រុងឡូវែល ដែលឥឡូវជាសកម្មជនគណបក្សសង្គ្រោះជាតិនៅគេហដ្ឋានឡូវែលរបស់លោក ង៉ោ គិមជាង។



លោកអញ្ជើញទៅភ្នំពេញលើកនេះ គឺជាការបំពេញភារៈកិច្ចចាំបាច់របស់គណបក្សលោក លោក ង៉ោ គីមជាង ពន្យល់ថា កិច្ចព្រមព្រៀងរវាងគបក្សប្រជាជននឹងគណបក្សសង្គ្រោះជាតិ គឺជាដំណាក់ការណ៍ថ្មីនៃជ័យជំនះរបស់ពលរដ្ឋដែលចង់ឃើញគណបក្សសង្គ្រោះជាតិឈ្នះឆ្នោតនាថ្ងៃមុខ គឺត្រូវកែរទម្រង់គណកម្មការជាតិរៀបចំការបោះឆ្នោតតែរសមាសភាពគ្រប់គ្រងសភាជាតិ ដើម្បីឱ្យការមានការបញ្ចេញយោបល់បានឮជ្រួតជ្រាបជាសាធារណបានលោកបញ្ជាក់ថា គណបក្សសង្គ្រោះជាតិមានសិទ្ធិនឹងបើកស្ថានីយ៍វិទ្យុទូរទស្សន៍មួយទៅអនាគតនឹងធ្វើឱ្យប្រជាពលរដ្ឋមិនខ្វះពតិមានដូចពេលមុនៗទៀតទេ។

ចំណែកលោក អ៊ុង រីទ្ធី ក៏បានឱ្យយោបល់ថា ប្រជាពលរដ្ឋនៅឡូវែលនេះធ្លាប់មានស្នាដៃជួយជ្រោមជ្រែងអ្នកប្រជាធិបតេយ្យយ៉ាងមុតមាំណាស់ដូច្នេះពេលនេះទៀត ប្រជាពលរដ្ឋត្រូវតែប្រមូលគ្នាឱ្យរឹតតែច្រើនឡើង ដើម្បីគាំទ្រគណបក្សសង្គ្រោះជាតិឱ្យរឹតតែមានកម្លាំងកើនថែមទៀត ដើម្បីប្តូរអំណាចពីដៃគណបក្សប្រជាជនឱ្យខាងតែបាន ។ នៅពេលសួរថា កម្លាំងប្រជាពលរដ្ឋបង្ហាញឆន្ទៈឡើងដោយបាតុកម្មធំៗនៅភ្នំពេញនឹងជនបទ តើកិច្ចព្រមព្រាងចូលសភានេះនឹងបញ្ចប់បាតុកម្មតាមផ្លូវដែរឬទេ? លោក គឹម ជាង ឆ្លើយថា ជារឿង២ដាច់គ្នានិងមិនបញ្ឈប់ទេ បាតុកម្មប្រជាពលរដ្ឋនៅតែមានការគាំទ្រនឹងចូលរួម រីឯការចូលសភាគឺជាចូលទៅកែរប្រែយុទ្ធសាស្ត្រមួយចំនួនដែលយើងធ្វើពីក្រៅមិនបាន ។ លោកបន្ថែមថា គណបក្សសង្គ្រោះជាតិនឹងយកតំណែងអនុប្រធានទី១រដ្ឋសភានឹងតំណែងប្រធានគណកម្មការចំនួន ៥ ក្នុសចំណោមគណកម្មការ១០នៃសភា ចំណែកតួរនាទីតំណាងរាស្ត្ររបស់លោកប្រធាន សម រង្ស៊ី យើងមិនមានដំណឹងអ្វីអាចជូនបាននៅឡើយទេ។

លោក អ៊ុង រីទ្ធី និយាយថាបេក្ខជនដែលចេញពីឡូវែលទៅនេះ បើមិនមានការគាំទ្រពីគ្រួសារខ្ពង់ខ្ពស់ទេ មិនអាចទៅឈរឈ្មោះបានទេ ដោយសារចំណាយច្រើនពេកនឹងពេលត្រូវបែកពីគ្រួសារក៏ច្រើនទៀត... លោក គឹម ជាង បានបន្ថែមថា ការងារនេះបើមិនចង់ជួយពូជសាស្ត្រខ្មែរយើងទេ ប្រាកដជាមិនអាចធ្វើបានទេ ដោយការប្រុងប្រយ័ត្ននឹងគ្រោះថ្នាក់ត្រូវមានគ្រប់ជំហ៊ាន ដូចជានៅថ្ងៃដែលគេវាយតំណាងរាស្ត្រ ញ៉យ ចំរើន បែកក្បាលសន្លប់បាត់ស្មារតី ខ្ញុំក៏នៅក្បែរនោះដែរ តែខ្ញុំមានសំណាងជាងចំរើនតែបន្តិចទេ...ថ្វីត្បិតតែលះបង់ច្រើនយ៉ាងនេះហើយក្តី ប្រសិនបើគណបក្សត្រូវការតំណែងខ្ញុំប្រគល់ទៅឱ្យលោក សម រង្ស៊ី ឱ្យលោកមានសិទ្ធធ្វើការក្នុងសភាបាន ខ្ញុំនឹងមិនស្តាយប្រគល់ជូនលោកដោយរីករាយទៀតផង ៕

## តមកពីទំព័រទី ១ អតីតយុទ្ធជនបានត្រូវអាមេរិកទទួលស្គាល់

បានចូលរួមក្នុងសង្គ្រាមវៀតណាមរបស់សហរដ្ឋអាមេរិក។ នេះជាលើកដំបូង ហើយដែលអតីតយុទ្ធជនខ្មែរបានទទួលដំណឹងដ៏គួរឱ្យរីករាយ ដែលខ្លួនរង់ចាំចាប់តាំងពីជំនាន់សាធារណរដ្ឋ គឺជាង៣៥ឆ្នាំមកហើយ។

លោកស្កុត តែរ (Scott Walker) អ្នកការពារខ្លឹមសារនៃច្បាប់នេះ បាននិយាយប្រាប់តំណាងសហគមន៍ខ្មែរនៅមីនីសូតាថា "លោកមានសេចក្តីរីករាយណាស់នឹងប្រកាសថា ព្រឹទ្ធសភាអាមេរិកាំងបានអនុម័តច្បាប់នេះ ជាឯកច្ឆ័ន កាលពីថ្ងៃព្រហស្បតិ៍ ហើយជាឱកាសប្រវត្តិសាស្ត្រខ្មែរដែលអាមេរិកាំងបានទទួលស្គាល់ស្នាដៃអតីតយុទ្ធជនខ្មែរក្នុងសង្គ្រាមអាមេរិកាំងនោះ"៕



Continued from page 02

## Lowell Folk Festival...

set up all over the center of Lowell, the entire downtown becomes part of the festival. Local cultural groups work in booths near the stages selling ethnic food from all over the world.

This year, the favorite musical act







of many was a Japanese taiko drumming group from San Francisco called Grand Master Seiichi Tanaka's San Francisco Taiko Dojo. Using drums that were designed more than 2000 years ago, the group combined complicated dance moves with ritual drumming to create a visual and sound sensation for everyone who saw them. The most popular food booth based on the lines of people waiting was Iskwelahang Pilipino (The Phillippine Society of Boston) which sold a variety of Filipino meat, rice and noodle dishes



along with Turon, also known as lumpiyang saging, which is a Filipino snack made of thinly sliced bananas and a slice of jackfruit, dusted with brown sugar, rolled in a spring roll wrapper and fried.

The favorite activity of many who attend the Lowell Folk Festival is simply walking through downtown Lowell, seeing friends and discovering new music and food. Many regular Lowell businesses remain open throughout the Folk Festival with special outdoor sales and dining and local musical acts later in the evening.

The Lowell Folk Festival is another one of the many ethnic festivals and celebrations that make Lowell such an interesting and rewarding place to live.

# បទសម្ភាសន៍ជាមួយនាង យោម បុប្ផា




**ពពីលេខមុន**

**សំនួរ:** បុប្ផា បានមកដល់ស.រ.អា.បានមួយរយៈបានឃើញរបៀបរបបស្រុកគេសេចក្ដីសម្រេចនានារបស់ពលរដ្ឋសង្គមគេបន្តិចទៀត ដល់ពេលទៅកម្ពុជាវិញហើយ តើបានរៀនសូត្រអ្វីខ្លះសម្រាប់នាំទៅស្រុកវិញទេ ?

**យោម បុប្ផា :** ក្នុងរយៈពេលដែលខ្ញុំមកស្នាក់នៅអាមេរិកនេះ ខ្ញុំបានរៀនសូត្រច្រើនណាស់ ខ្ញុំមើលឃើញថា ប្រជាពលរដ្ឋគេមានថាមពលខ្លាំងណាស់ ថ្វីត្បិតតែធ្វើមិនបានសម្រេចភ្លាមៗ ក៏មានការខុសពីស្រុកយើងឆ្ងាយណាស់ ខ្ញុំបានជួបក្រុបង្រៀនធំៗ នៅមហាវិទ្យាល័យហ្វេតឈ័រ ជួបអ្នកតស៊ូមតិមកពិច្រើនប្រទេស ខ្ញុំបានរៀនសូត្រពីគេច្រើនណាស់ ដែលខ្ញុំនឹងនាំទៅប្រាប់ដល់បងប្អូនយើងដែលកំពុងតែតស៊ូនៅ



កម្ពុជា រីឯបងប្អូនខ្មែរយើងនៅឡូវែលនេះ បានបង្ហាញនូវការស្រឡាញ់រាប់អានរត់មករកជួបខ្ញុំជួយឧបត្ថម្ភ ហើយនឹកទៅដល់បងប្អូនដែលនៅកម្ពុជាធ្វើឱ្យខ្ញុំរីករាយដោយបានដឹងថា យើងដែលនៅតស៊ូឯណោះមិននៅម្នាក់ឯងទេ មានការគាំទ្រពិបងប្អូនខ្មែរពីស្រុកអាមេរិកយើងដែរ ។



**សំនួរ:** តាំងពីមកដល់ស.រ.អា. នេះ បុប្ផាមានពេលតែ២ថ្ងៃប៉ុណ្ណោះ គឺថ្ងៃសៅរ៍នឹងអាទិត្យនេះ សម្រាប់ជួបនឹងសហគមន៍ខ្មែរនៅឡូវែល ហើយតើនៅអាទិត្យក្រោយនឹងទៅកន្លែងណាទៀត?...

**យោម បុប្ផា : ចាស ! ខ្ញុំទៅរដ្ឋធានីវ៉ាស៊ីនតុនមួយសប្ដាហ៍**

**សំនួរ:** បុប្ផា បានមកដល់ស.រ.អា.បានមួយរយៈបានឃើញរបៀបរបបស្រុកគេសេចក្ដីសម្រេចនានារបស់ពលរដ្ឋសង្គមគេបន្តិចទៀតដល់ពេលទៅកម្ពុជាវិញហើយ តើបានរៀនសូត្រអ្វីខ្លះសម្រាប់នាំទៅស្រុកវិញទេ?

**យោម បុប្ផា :** ក្នុងរយៈពេលដែលខ្ញុំមកស្នាក់នៅអាមេរិកនេះ ខ្ញុំបានរៀនសូត្រច្រើនណាស់ ខ្ញុំមើលឃើញថាប្រជាពលរដ្ឋគេមានឋាមពលខ្លាំងណាស់ ថ្វីត្បិតតែធ្វើមិនបានសម្រេចភ្លាមៗ ក៏មានការខុសពីស្រុកយើងឆ្ងាយណាស់ ខ្ញុំបានជួបគ្រូបង្រៀនធំៗនៅមហាវិទ្យាល័យហ្វេតឈ័រ ជួបអ្នកតស៊ូមតិមកពិច្រើនប្រទេសខ្ញុំបានរៀនសូត្រពីគេច្រើនណាស់ ដែលខ្ញុំនឹងនាំទៅប្រាប់ដល់បងប្អូនយើងដែលកំពុងតែតស៊ូនៅកម្ពុជា រីឯបងប្អូនខ្មែរយើងនៅឡូវែលនេះបានបង្ហាញនូវការស្រឡាញ់រាប់អានរត់មករកជួបខ្ញុំជួយឧបត្ថម្ភ ហើយនឹកទៅដល់បងប្អូនដែលនៅកម្ពុជាធ្វើឱ្យខ្ញុំរីករាយដោយបានដឹងថា យើងដែលនៅតស៊ូឯណោះមិននៅម្នាក់ឯងទេ មានការគាំទ្រពិបងប្អូនខ្មែរពីស្រុកអាមេរិកយើងដែរ ។

**សំនួរ :** មានពានរង្វាន់ប្រកបដោយកិត្តិយសដឹងថាមានមិត្តភក្រ្តគាំទ្រជុំវិញពភពលោក តើ បុប្ផា នាំការរីករាយទៅចែកចាយបងប្អូនអ្នកតស៊ូនៅមុខអាជ្ញាធររាល់ថ្ងៃយ៉ាងណា?

**យោម បុប្ផា:** ពានរង្វាន់នេះមិនមែនតែជាស្នាដៃរបស់ខ្ញុំតែម្នាក់ទេ ហើយមកទទួលរង្វាន់នេះនៅស.រ.អា. ធ្វើឱ្យយើងខ្ញុំយលថា ទង្វើយើងខ្ញុំគឺត្រឹមត្រូវស្របច្បាប់ នេះគឺជាស្នាដៃរបស់សហគមន៍បឹងកក់ ក៏ដូចជាស្នាដៃរបស់ពលរដ្ឋកម្ពុជាទាំងមូលដែរ ដូចជាអ្នកដែលស្រឡាញ់យុត្តិធម៌អ្នកស្រឡាញ់សិទ្ធមនុស្សជាដើម ។

**សំនួរ :** តើអាចប្រាប់បានទេ ថានរណាជាមនុស្ស៥នាក់ដំបូងដែលបុផ្ផានឹកទៅដល់ពួកគេថាបានធ្វើសកម្មភាពស្លាប់រស់ជាមួយគ្នាជារៀងរហូតមក?

យោម បុផ្ផា អ្នកស្រី ទេព វន្នី គាត់ធ្លាប់មកស្រុកអាមេរិកទទួលពានរង្វាន់ដូចខ្ញុំដែរ លោកយាយ ង៉ែត ឃុន អ្នកស្រី គង់ ចន្ថា អ្នកស្រី បូ ឆវី ហើយអ្នកដែលជិតស្និតបំផុតនោះ គឺម្ដាយរបស់ខ្ញុំ អ្នកស្រី សាបូ សុខ ដែលឱ្យកម្លាំងចិត្តដ៏ខ្លាំងខ្លាដល់ខ្ញុំ

**សំនួរ :** នាងមានកូនប្រុសមួយ តើគេមានបានជួយគាំទ្រអ្វីដែរទេ ?

**យោម បុប្ផា :** ខ្ញុំមិននឹកស្មានថា កូនប្រុសខ្ញុំអាយុប៉ុណ្ណឹងមិនគួរចេះឈឺចាប់ដល់ប៉ុណ្ណឹងទេ គឺនៅពេលខ្ញុំនៅក្នុងគុកកូនខ្ញុំមានទទួលការឈឺចាប់យ៉ាងខ្លាំង ហើយចេះទៅតវ៉ាគ្រប់ទីកន្លែងដើម្បីរំដោះខ្ញុំឱ្យបានរួចខ្លួនមកវិញ ខ្ញុំអាណិតគេណាស់ ។

**សំនួរ :** តាំងពីមកដល់ស.រ.អា.នេះ បុប្ផាមានពេលតែ២ថ្ងៃប៉ុណ្ណោះ គឺថ្ងៃសៅរ៍នឹងអាទិត្យនេះ សម្រាប់ជួបនឹងសហគមន៍ខ្មែរនៅឡូវែល ហើយតើនៅអាទិត្យក្រោយនឹងទៅកន្លែងណាទៀត?

**យោម បុប្ផា:** ថ្ងៃចន្ទ គឺថ្ងៃនេះ ខ្ញុំឡើងយន្តហោះទៅរដ្ឋធានីវ៉ាស៊ីនតោនក្រុមអង្គការសិទ្ធមនុស្សនៅទីនោះ នឹងមកទទួលខ្ញុំនៅព្រលានយន្តហោះ ដើម្បីចូលរួមកិច្ចប្រជុំសិក្សាកាងារមួយចំនួនទៀត អស់ពេញមួយអាទិត្យនៅថ្ងៃសៅរ៍នឹងអាទិត្យបន្ទាប់មក ទើបខ្ញុំមានពេលបានជួបបងប្អូនខ្មែរនៅតំបន់រដ្ឋធានីវ៉ាស៊ីនតោនបាន ។

**តទៅលេខក្រោយ**





រូបផតគ្រុមគ្រួសាររបស់ សេម សាន់
sam san´s Family Photo in cambodia



សេម សាន់ កាលនៅទារក និងម្តាយឈ្មោះ ឃិ ប៊ុនសន
(ដែល សេម សាន់ កំពុងស្វែងរក)

# សេម សាន់ (Sam Sann) ខ្មែរតែមួយរូប ដែលប្រកួតកីឡាឆ្លងកាត់ឧបសគ្គ American Ninja Warrior

ដោយ : សុខា

**ក្រុង ហាសតុន រដ្ឋតិចសាស់:** កីឡាឆ្លងកាត់ឧបសគ្គដែលរៀបចំដោយការច្នៃប្រឌិតរបស់មនុស្សប្រកួតនៅសហរដ្ឋអាមេរិកមានឈ្មោះថា American Ninja Warrior ។ កីឡាមួយនេះ មានដើមចមចេញពីប្រទេសជប៉ុន ហើយបានបញ្ជ្រាបចូលក្នុងសហរដ្ឋអាមេរិក កាលពី២០ឆ្នាំមុនមានឈ្មោះដើមថា Sasakue ។

លោក សេម សាន់ (Sam Sann) ស្ថិតក្នុងឈុតពណ៌លឿងនៅឯការប្រកួតពាក់កណ្តាលផ្តាច់ព្រ័ត្រដែលប្រព្រឹត្តទៅនៅក្រុងដាឡាស ។ លោក សេម សាន់ បានឆ្លងកាត់ឧបសគ្គដោយជោគជ័យ និងទាន់ពេលវេលា ហើយទទួលបានឱកាសប្រកួតវគ្គផ្តាច់ព្រ័ត្រនៅក្រុងឡាសវេហ្គាស ។

វត្តមានរបស់លោក សេម សាន់ ដែលជាខ្មែរតែម្នាក់ចេញមកពីរដ្ឋតិចសាស់ទៅប្រកួតថ្នាក់ជាតិនៅក្រុងឡាសវេហ្គាសបានធ្វើឱ្យមហាជនចាប់អារម្មណ៍នឹងសមត្ថភាពរបស់ សេម សាន់ ជាខ្លាំង។ លោកមានមោទនភាពចំពោះសមត្ថភាព



សេម សាន់ និងបងស្រី

របស់លោក ហើយលោកចង់បង្ហាញដល់សាធារណជនឱ្យបានដឹងថា អាយុមិនមែនជាឧបសគ្គសម្រាប់អ្នកឡើយ ។ គួរបញ្ជាក់ផងដែរ លោក សេម សាន់ ជាបេក្ខជនដែលមានអាយុច្រើនជាងគេ(៤៧ឆ្នាំ)ប្រកួតក្នុងកីឡាមួយនេះ ។

លោក សេម សាន់ បានរៀបរាប់អំពីការដាក់ចិត្តដាក់កាយលេងកីឡាយ៉ាងដូច្នេះថា លោកមើលឃើញពីជីវិតកន្លងមកមិនដែលបានសប្បាយ



សេម សាន់ និង ឪពុកសម្រង សាន់ ឆ្នាំ១៩៨០

ឡើយ ដូចនេះការលេងកីឡាជាសកម្មភាពផ្តល់ភាពរីករាយ ។ លោកចាត់ទុកសេចក្តីសុខដែលលោកទទួលបានពីកីឡាយកមកបូកដកទូទាត់ជាមួយពេលលំបាកកាលនៅប្រទេសខ្មែរ (ពិសេសពេលដែលលោកឆ្លងកាត់របបប៉ុល ពត ខ្វះអាហារ



ម្តាយរបស់ សេម សាន់ និងជីដូន

សម្លៀកបំពាក់គ្មានការរៀនសូត្រជីវិតហាក់ឥតមានន័យឡើយ)។

ការយកចិត្តទុកដាក់ទៅលើកីឡាតស៊ូនឹងឧបសគ្គនេះ (American Ninja Warrior) លោកចាំមិនភ្លេចនិមិត្តរូបគ្រូបង្វឹករបស់លោកដែលមានឈ្មោះថា ចេន ខាលហេន (Jaine Culhane)។ ការអំណត់ព្យាយាម និងភាពច្បាស់លាស់ក្នុងវិស័យអត្តពលកម្មនេះ បានធ្វើឱ្យលោកក្លាយជាអ្នកលេងកីឡាដ៏ប្រសើរ និងមានសមត្ថភាពបើកទូរមជ្ឈមណ្ឌលកីឡាដែលមានឈ្មោះថា អាយអិន ស្ពតក្លឹប (Iron Sport Club)។ ក្រៅពីនេះ លោកនិងភរិយា ហ្គាបប៊ី (Gabby) មានបើកជាហាងកែសម្ផស្សថែមទៀតផង។ លោកបង្ហើបថា លោកធ្វើការមួយថ្ងៃ ១៦ម៉ោងនៅទីកន្លែងទាំងពីរ។ អ្វីៗដែលបានកសាងសុទ្ធសឹងជាញើសឈាមនៃការតស៊ូទាំងពីរនាក់ប្តីប្រពន្ធ។ ជាមួយគ្នានោះលោកបានឱ្យតម្លៃ

តទៅទំព័រទី ១៩



ភរិយាលោក សេម សាន់ ឈ្មោះ Gabby និងកូនស្រីឈ្មោះ Amber កាលពីជាង១៣ឆ្នាំមុន




សេម សាន់ ប្រកួតកង់នៅតិចសាស់១៤ឆ្នាំមុន




... ប្រកួត American Ninga Warrior
កាលពីថ្ងៃទី ៣ មិថុនា ២០១៤

## តមកពីទំព័រ ០៧ ជ្រួលច្របល់នៅ ម៉ាឃីត បាសឃីត ...

អាហារនៅម៉ាឃីតបាសឃីតនៅពេលនេះឡើយ ។

ការប្រែប្រួលយ៉ាងគំហក់ក្នុងពេលប្រថុចព្រួចនេះ មានដើមចមចេញមកពីការធ្វើពហិកាមិនចូលធ្វើការនៅក្នុងម៉ាឃីតបាសឃីត ។ ម៉ាឃីតបាសឃីតដែលតែងតែមានមនុស្សម្នាចេញចូលទិញអាហារឥតដាច់នោះ ប្រែក្លាយទៅជាស្ងាត់ប្លែកធម្មតានៅថ្ងៃច័ន្ទស្របពេលនឹងទិដ្ឋភាពក្នុងហាងក្នុងបញ្ជរអាហារស្រស់ និង បន្លែ ផ្លែឈើមួយចំនួនមានភាពទំនេរ ត្បិតប្រភពមិនផ្លូវការមួយចំនួយបញ្ជាក់ថា ទំនិញស្តុកទុកមានការកកស្ទះ ព្រោះបុគ្គលិកដែលទទួលបន្ទុកកិច្ចការនេះចេញមកធ្វើបាតុកម្មមិនថា តែនៅម៉ាឃីតបាស់ឃីតសាខា ធីកសប៊ីរី សូម្បីនៅផ្លូវ ប្រដវេយ៍ និងសាខាផ្សេងៗទៀត ក៏មានការបង្ហាញការមិនគាំទ្រចំពោះការបណ្តេញចេញអតីតអគ្គនាយកប្រចាំម៉ាឃីតបាស់ឃីត គឺលោក អាធី ឌី ឌីម៉ូលីស ។ ពហិការមិនព្រមធ្វើការក្នុងរូបភាពបាតុកម្មនេះ ត្រូវការឱ្យលោក អាធី ឌី ឌីម៉ូលីស ត្រឡប់មកកាន់តំណែងវិញ ត្បិតអ្នកគាំទ្រលោកអាធី ឌី ឌីម៉ូលីស បញ្ជាក់ថា គេមិនពេញចិត្តអគ្គនាយកថ្មី អាធី អេស ឌីម៉ូលីស ឡើយ ។



លោក ចូន អេសវីដូ (Juan Aceverdo) ប្រធានផ្នែកគិតលុយ និងអ្នកស្រី ម៉ារីហ្សា (Maritza)



អ្នកគាំទ្រ អាធី ឌី





ទិដ្ឋភាពក្នុងផ្សារ

នាងចាហ៊ីរ៉ា ហ្គាស្យា (Jahira Garcia) ជាកូនរបស់អ្នកស្រី ម៉ារីតហ្សា (Maritza) ដែលបានបំពេញការងារនៅម៉ាឃីតបាស់ឃីតបានថ្លែងថា នាងចង់ឱ្យលោក អាធី ឌី ឌីម៉ូលីស ត្រលប់មកកាន់តំណែងរបស់គាត់វិញ ។ នាងគាំទ្រលោក អាធី ឌី ឌីម៉ូលីស ត្បិតនាងនិយាយថា នាងធ្លាប់ជួបលោកអាធី ឌី ឌីម៉ូលីស ដោយផ្ទាល់ ហើយលោកអាធី ឌី ឌីម៉ូលីស ជាមនុស្សល្អចេះដឹងសុខទុក្ខកូនចៅដែលធ្វើការឱ្យលោកមិនបណ្តេញបុគ្គលិកឱ្យអត់ការងារធ្វើឡើយ ។ ស្របគ្នានោះ នាងថ្លែងពីមូលហេតុដែលនាងមិនគាំទ្រអគ្គនាយកថ្មី ត្បិតនាងលើកឡើងថា នាងឮពាក្យចចាមអារាមថា នាយកថ្មី អាធី អេស ឌីម៉ូលីស ជាមនុស្សលោភលន់ ។ នាងនិយាយថា "មើលចុះមិនបានប៉ុន្មានថ្ងៃផង គេបណ្តេញមនុស្សឱ្យឈប់ធ្វើការអស់៨នាក់បាត់ហើយ ។ យើងមិនដឹងថា តទៅមុខ បើគេកាន់តំណែងនេះប្រាកដមែនមានការប្រែប្រួលយ៉ាងណាទេ ។ យើងបារម្ភថា គេនឹងតម្លើងថ្លៃទំនិញ ។ ដោយសារតែពួកយើងធ្វើការផង និងទិញម្ហូបអាហារពីទីនេះផង បើដូច្នោះ បើគេតំឡើងថ្លៃទំនិញមែននោះ វានឹងប៉ះពាល់ដល់សេដ្ឋកិច្ចរបស់ពួកយើងជាមិនខាន ។


អាធី អេស


អាធី ឌី

នាង និងលោក ចូន អេសវីដូ (Juan Acevedo) ដែលជាប្រធានផ្នែកគិតលុយនៅម៉ាឃីតបាសឃីតដែលចេញមកធ្វើបាតុកម្មនេះ បាននិយាយថា ពួកយើងពេញចិត្តមកធ្វើបាតុកម្មដោយខ្លួនឯង និងនៅក្នុងម៉ោងផ្ទាល់ខ្លួនរបស់ពួកយើង ។ យើងសុខចិត្តលំបាកឱ្យតែប្រធានរបស់យើងត្រឡប់មកកាន់ការងាររបស់គាត់វិញ ។

ពិនិត្យមើលលើស្ថានភាពនៃពហិការនាំឱ្យសាធារណជនយល់ថា លោក អាធីឌី ឌីម៉ូលីស មានការគាំទ្រខ្លាំងពីបុគ្គលិកនៃម៉ាឃីត បាសឃីត ។ តើលោកអាធី អេ ឌីម៉ូលីស មានលក្ខណៈពិសេសអ្វីដែលនាំឱ្យលោកទទួលបានការគាំទ្រយ៉ាងនេះ?



អ្នកគាំទ្រ អាធី ឌី ប្រមូលផ្តុំគ្នា ធ្វើពហិកានៅម៉ាឃីតបាសឃីត សាខាធីក ប៊ីរី








**តើមានមូលហេតុពាក់ពាន់អ្វីផ្សេងទៀតដែលនាំឱ្យផ្ទុះរឿងនេះឡើង?**

ផ្អែកទៅលើប្រភពព័ត៌មានពីបសស្តុនហ្គូបចេញផ្សាយថ្ងៃទី២២ កក្កដា ឆ្នាំ២០១៤ ក្នុងខ្សែវីដេអូមានរយៈពេល១នាទី និង២៥វិនាទីនោះបានរៀបរាប់ជាសង្ខេបអំពីប្រវត្តិនៃការបង្កើតទុនរួមគ្នាដែលនាំឱ្យមានសាជីវកម្មខ្នាតធំ ម៉ាឃីតបាស់ឃីតនេះឡើង ។ ប្រភពនេះបញ្ជាក់ថា ឆ្នាំ១៩៥៤ឪពុករបស់អ្នកទាំងពីរបានបណ្តាក់ទុនរួមគ្នាបង្កើតផ្សារម៉ាឃីតបាស់ឃីតនេះឡើងបន្តពីឪពុករបស់គេ ។ តែបន្ទាប់ពីឪពុករបស់ អាធី អេស ឌីម៉ូលីស ស្លាប់នៅឆ្នាំ១៩៧១ ដោយសារជំងឺគាំងបេះដូងឪពុករបស់អាធី ឌី ឌីម៉ូលីស បានបន្តដឹកនាំជំនួញនាឆ្នាំ១៩៩១ ។ តែក្រុមគ្រួសាររបស់ អាធី អេស ឌីម៉ូលីស បានដាក់ពាក្យបណ្តឹងទៅតុលាការចោទប្រកាន់ឪពុករបស់អាធី ឌី ឌីម៉ូលីស ថាបានលួចភាគហ៊ុនរបស់ពួកគេ ។ ក្នុងការតវ៉ាផ្លូវច្បាប់ឪពុករបស់អាធី ឌី ឌីម៉ូលីសបានចាញ់ក្តីនៅឆ្នាំ១៩៩៤ ។ យ៉ាងណាមិញផ្ទុយទៅនឹងបរាជ័យខាងផ្នែកតវ៉ាក្តីក្នុងតុលាការលោក អាធី ឌី ឌីម៉ូលីស ដែលជាកូនរបស់ តេលេម៉ាខឹស ត្រូវបានទទួលការគាំទ្រពីគណកម្មការនាយកក្នុងស្ថាប័ននេះ ហើយត្រូវបានគេបោះឆ្នោតក្លាយជាអគ្គនាយកដឹកនាំម៉ាឃីតបាស់ឃីតរហូតមកត្រឹមពេលថ្មីៗនេះ គណកម្មការនាយកជំនុំទម្លាក់អាធី ឌី ឌីម៉ូលីស ហើយជំនួសដោយ អាធី អេស ឌីម៉ូលីស ជានាយកថ្មី ៕

# “សិស្សថ្មី” New Students

**អត្ថបទដកស្រង់ពីប្លុករបស់រីឆីតហាវ :**

បញ្ហាអន្តោប្រវេសន៍បានផ្ទុះជារឿងធំនៅសហរដ្ឋអាមេរិកនេះដោយសារកុមារមកពីអាមេរិកខាងត្បូងបានត្រូវបញ្ជូនឆ្លងដែនយ៉ាងសន្ធឹកសន្ធាប់តាំងពីដើមឆ្នាំមកទល់ពេលនេះ ចំនួនជាង៥ម៉ឺននាក់ហើយ គេរំពឹងថា ចំនួននេះឡើងដល់៩ម៉ឺននាក់រហូតដល់ដាច់ឆ្នាំ២០១៤នេះ។ នៅសាលាក្រុងឡូវែលមានការពិភាក្សាជាន់ខ្ពស់ពីគំនិតដែលថា ទទួលយកកុមារមួយចំនួនមកឧបត្ថម្ភដោយមិនចង់ឱ្យគេបញ្ជូនកុមារទាំងនោះឱ្យត្រឡប់ទៅជួបវិបត្តិនៃអាមេរិកខាងត្បូងឡើយ។ ក្នុងឱកាសពិភាក្សានោះមានការបញ្ចេញមតិថា "នឹងមានការចាយវាយថវិកាក្នុងតំបន់ដែលធ្វើឱ្យប៉ះពាល់ដល់ថវិការបស់អ្នកបង់ពន្ធ..."។ គំនិតនេះបង្ហាញពីការភ័នច្រឡំដោយសារ "ដើម្បីជួយដល់កុមារភៀសខ្លួនទាំងឡាយថវិកាតំបន់ត្រូវចេញតែ១០ភាគរយតែប៉ុណ្ណោះចំណែកចំណាយដែលនៅសល់៩០ភាគរយ គឺរដ្ឋចេញទាំងអស់"។ រីឆីតហាវ ចង់បង្ហាញក្នុងអត្ថបទជាភាសាអង់គ្លេសអំពីផលចំណេញទាំងឡាយដែលបានកើតឡើងនៅពេលដែលឡូវែលបានទទួលស្វាគមន៍សហគមន៍អាស៊ីអាគ្នេយ៍មានជាអាទិ៍ខ្មែរដែលចេះតែមកដល់ជាបន្តបន្ទាប់ ឥឡូវនេះក៏បានក្លាយទៅជាផ្នែកមួយនៃអ្នកកសាងតំបន់នៃសហរដ្ឋអាមេរិកទៅហើយ។

សូមអានអត្ថបទជាភាសាអង់គ្លេសរបស់ រីឆីត ហាវ ដូចតទៅនេះ:




## Lowell Week in Review: July 27, 2014

**by Richard Howe Jr.**

The issue of the cost of young people from other countries enrolling in the Lowell public schools (which came up on a motion by Mayor Rodney Elliott at Tuesday's Council meeting) is a tricky one. Certainly it is far more expensive to educate a 16 year old who arrives in the U.S. as a refugee from a war-torn country with no prior formal education than it is to educate someone with an age appropria te level of education and a mastery of the English language. If the Federal government is designating Lowell as a resettlement site for such refugees, it's completely appropriate for local political leaders to lobby the Federal government for additional funds to offset the financial impact of refugee students on the local public schools. That's what city leaders did back in the late 1980s when the schools were overwhelmed with an average of 50 new students each week coming from refugee camps in Thailand and the Philippines. Back then, city lobbying yielded more than $500,000 in "refugee impact funds" for the Lowell Public Schools thanks to a bill pushed through Congress by then Senator Edward Kennedy. Hopefully something similar will happen now.

But what if additional funds aren't forthcoming? What are we to do? Are we to built a wall around the city? Are we to say "no more newcomers to Lowell"? Some longtime Lowell residents felt that way about the Cambodian refugees coming to Lowell back in 1987; some even said it publicly. But more reasonable city leaders, both elected and otherwise, tamped down such talk and the newcomers quickly became part of the fabric of the Lowell community. That was on display this week with the sincere and moving presentation at the start of this week's city council meeting that recognized how the entire city pulled together in the aftermath of the deadly fire on Branch Street, a tragedy that struck the Cambodian community especially hard. Today, 25 years after their arrival as refugees, Cambodians are just as much a part of Lowell's community as are the members of every ethnic group that's come before them and their presence makes Lowell a better place. Yet if the "keep them out" mentality had prevailed in 1987, our Cambodian neighbors either wouldn't be here or would have a more negative relationship with the community.

Why has this issue arisen now? It's not like immigrants and refugees just started arriving in Lowell. That was evident at this year's Lowell High graduation ceremony which featured Air Force JROTC cadets carrying into the Tsongas Center the flags of all the nations of birth of graduating seniors. Included were the flags of Bangladesh, Brazil, Canada, Cote D'Ivore, China, Columbia, Cape Verde, Dominican Republic, Ecuador, Ghana, Guinea, Honduras, **Continued to page 23**

# សើចនឹងយំរបស់អ្នកគាំទ្រគណបក្សសង្គ្រោះជាតិ




**ទស្សនៈឯករាជ្យដោយ : ជើង សេង**

**ហ្វីឡាដែលហ្វៀ-គេយំស្រែកថា :** ហេតុអ្វីក៏គណបក្សសង្គ្រោះជាតិ គ.ស.ជ.ប្តូរឥរិយាបទធ្វើអី? គ.ស.ជ.ពុំបានប្តូរទស្សនៈរបស់ខ្លួនទេ ពួកគាត់គ្រាន់តែឈោងចាប់យកផលប្រយោជន៍ដែលប្រសើបំផុតក្នុងខណៈនេះ សម្រាប់កម្ពុជាតែប៉ុណ្ណោះទេ -នេះជានយោបាយកុំអាលស្អប់កីឡាករដែលប្តូរស្មៀត ហើយក៏ទៅស្អប់កីឡាតែម្តងនោះ ។ ខ្ញុំចង់ឃើញខ្មែរដែលស្រឡាញ់គ.ស.ជ. មានការព្យាយាមរម្ងាប់កំហឹងតាមដានពិនិត្យ ហើយបន្តប្រមូលផ្តុំគ្នាឱ្យកាន់តែច្រើនជៀសវាងការគិតអវិជ្ជមានដែលនាំឱ្យអ្នកដទៃអាចចូលមកបំបែកជំនឿអ្នកបាន។ សូមអញ្ជើញតាមដានអានការវិភាគរបស់ ជើងសេង ជាភាសាអង់គ្លេសដូចតទៅៈ

## CNRP supporters are learning how capture what they have won; but at the same time expressed concerns and disappointments.

Human evolution is about adapted to change; change is within us as tiny molecule particle inside our body constantly changing from moment to moment and as time went by we aged. We cannot stop change and certainly cannot afford to remain idle. We must adapt to change in order for our survival. In leadership you must be flexible and adapt to change when opportunity arises and you must be able to capture that moment for the national interests. People cried, why did CNRP changed their position? CNRP never change the position rather it captured the moment present to them as they see the best interest of Cambodian. This is politic; don't hate the players, hate the game. Yesterday promised cannot remain idle or the same when opportunity arise for better future for all people; this is what leadership is all about. There will be property casualty in this game of politic when changed took place. Please keep this in mind before you involve in political game. Patriot without critical thinking is like compassion without wisdom; it could lead people into a deep cliff of no return.

The question to the CNRP supporter should be, did CPP give all those items now when CNRP first demanded it? Did CPP give equal shares of NEC and other powers? Did CPP agree to reform NEC? What about now? Until CNRP started protests and rally the world then we arrived to today conclusion which you should be proud of your hard works. Reforming NEC is the key toward future fair election if you wanted to win or replaced CPP machine; the system must be changed. People needed to realize that they have won some of the battles that they strived so hard with protests and lobbying the world leaders. I say, why you don't give CNRP leaders a chance to make change from inside the parliament. How can you help people by being outside the parliament? Cambodian suffers so much such as: land grabbing issues, immigration issues, health and safety, jobs, education, infrastructures, business developments etc. How do you think these issues being reduced if CNRP doesn't join the parliament to resolve the issues?

I want people to understand very clear; joining the parliament doesn't mean they are joining CPP; it means they have opportunity to change the law and they can work toward finding solution for Cambodian that desperately needed representation. Who care about the poor people now in the current government? No one care about them right now; this cannot continue. This is the road toward democracy and yes it is rough road. In any dispute, if the party involved doesn't want to sit down; how can you find solution?

If CNRP stick together; they will lead Cambodian to victory some day but if they are divided; their fate is no different from the royal party. This is why it is critical that they learn from the past and not afraid to challenge CPP head on and you have done so much already. You have taken away things that they don't want to give you; things that they don't want you to have. You can't win all things right now but you will in time. I will also list some of the things why CPP willing to negotiate so that CNRP supporters can see things clearly why they should remain calm and stick together not left each other in the middle of the road. For CPP; they also gained something too in order for them to agree to sign the agreement:

**1.** It legitimizes the government to operate; it looks good in the eyes of world democracy; although they hated to give up some of the demands.

**2.** By giving CNRP some power and leverages to quiet the protests and reduced pressures from the world leaders and the internal power structure; it potentially creates chaos and un-trusted environment for CNRP leaders if they show the public that they give up something easily so that the supporters wonder what happened; this is the mind game played in the past. This is the game played with the royal group in the past. Do CNRP supporters fall into the trap by dividing themselves again? Only time will tell if CNRP knows how to play the game or not. Right now; I have seen some division already because of emotional thinker rather than critical thinker. I hope they realized that it is a mind game being played on them.

**3.** Reduced world attention on Cambodia's situation, reduced the momentum of protests that could put the government at risk, reduced tension with angry protesters and the world was watching 7 CNRP MP was in jail; it doesn't look good for the government.



**4.** Reduced pressure from Khmer Krom Group from further protests against VN and stray away from world discussion about Khmer land seeded to VN in 1949 by the France. This is hottest topic; it will open a can of worm that no one wants take on the issues. Cambodia's government is struggling protecting the current border, let alone opens the discussion of Khmer Krom land.

**5.** Give legitimacy the current government and by sometimes to restructuring CPP future candidates/leadership. Buying time for Prime Minister Hun Sen to complete this term and positioning his people to take over in the future and stabilize many deals in the pipeline.

Remember, CPP didn't want to give up anything from beginning until many situations were created CNRP supporter and CPP has to deal with the situations to avoid being unplugged by the boss. At end, CNRP supporters won and they needed to learn to recognize it and capture it.

ឌឺ ខេមបូឌា ដេលី The Cambodia Daily

ដំណឹងប្រែសម្រួលពីកាសារអង់គ្លេស អត្ថបទដកស្រង់ និងទទួលការអនុញ្ញាតឱ្យធ្វើការចុះផ្សាយពី ឌឺ ខេមបូឌា ដេលី ច្បាប់ចេញផ្សាយថ្ងៃ សុក្រ ទី២៥ ខែកក្កដា ឆ្នាំ២០១៤

# លោក ហ៊ុន សែន និងលោក សម រង្ស៊ី ព្រមព្រៀងគ្នា ហើយគណបក្សសង្គ្រោះជាតិនឹងទទួលយកអាសនៈរដ្ឋសភា

**ដោយ : អេឡិក ខុនស៊ីកលីអូ and មុិច ដារ៉ា** | **July 23, 2014**

លោកនាយករដ្ឋមន្ត្រី ហ៊ុន សែន និងលោក សម រង្ស៊ី មេដឹកនាំគណបក្សប្រឆាំងបានចេញពីកិច្ចចរចារយៈពេលប្រាំម៉ោងនៅក្នុងទីក្រុងភ្នំពេញកាលពីម្សិលមិញដោយមានការព្រមព្រៀងគ្នាឱ្យតំណាងរាស្ត្រជាប់ឆ្នោតទាំង៥៥រូប របស់គណបក្សសង្គ្រោះជាតិបញ្ចប់ការធ្វើពហិការរបស់ខ្លួនមិនចូលរដ្ឋសភាជាថ្នូរនឹងការផ្លាស់ប្តូរគណៈកម្មាធិការជាតិរៀបចំការបោះឆ្នោតដែលពួកគាត់ចោទថាបានលួចបន្លំការបោះឆ្នោតកាលពីឆ្នាំមុនសម្រាប់គណបក្សប្រជាជនកម្ពុជា។

តំណាងរាស្ត្រជាប់ឆ្នោតគណបក្សសង្គ្រោះជាតិប្រាំពីររូបរួមជាមួយសកម្មជនគណបក្សមួយរូបដែលត្រូវបានចាប់ដាក់ពន្ធនាគារកាលពីសប្តាហ៍មុនតាមការចោទប្រកាន់មិនត្រឹមត្រូវពីបទ "ដឹកនាំចលនាកុបកម្ម"ក៏ត្រូវបានដោះលែងផងដែរកាលពីម្សិលមិញ ដើម្បីអនុញ្ញាតឱ្យពួកគាត់ស្បថចូលកាន់តំណែងនៅក្នុងរដ្ឋសភា។

សេចក្តីប្រកាសមួយដែលគណបក្សទាំងពីរបានចេញបន្ទាប់ពីការចរចានេះលើកឡើងថា គណៈកម្មាធិការជាតិរៀបចំការបោះឆ្នោតថ្មីនឹងមានសមាជិក៩រូបដដែល គឺ៤រូបជ្រើសរើសដោយគណបក្សប្រជាជនកម្ពុជា៤រូបជ្រើសរើសដោយគណបក្សសង្គ្រោះជាតិ និងសមាជិកទី៩មួយរូបទៀតជ្រើសរើសដោយមានការព្រមព្រៀងគ្នាពីគណបក្សទាំងពីរ។ ដំណើការជ្រើសរើសសមាជិកទាំងនេះនឹងធ្វើឡើងតាមរយៈគណៈកម្មាធិការអចិន្ត្រៃយ៍របស់រដ្ឋសភា។

លោក សម រង្ស៊ី បានមានប្រសាសន៍បន្ទាប់ពីការចរចាភ្លាម១ថា កិច្ចព្រមព្រៀងបង្កើតគណៈកម្មាធិការរៀបចំការបោះឆ្នោតថ្មីនេះ នឹងត្រូវចែងច្បាស់នៅក្នុងរដ្ឋធម្មនុញ្ញដោយការបង្កើតជំពូក១៥ថ្មីមួយ។

លោកបានមានប្រសាសន៍ថា "រដ្ឋធម្មនុញ្ញនឹងចែងច្បាស់អំពីរបៀបជ្រើសរើសសមាជិកទី៩។ គណបក្សសង្គ្រោះជាតិនឹងជ្រើសរើស៤រូប គណបក្សប្រជាជនកម្ពុជាត្រូវជ្រើសរើស៤រូប ហើយសមាជិកទី៩ ត្រូវមានការយល់ព្រមពីគណបក្សទាំងពីរ"។

មេដឹកនាំគណបក្សប្រឆាំងមិនគិតថា អាចមានការខ្វែងគំនិតគ្នាទៀតរវាងគណបក្សទាំងពីរក្នុងការជ្រើសរើសសមាជិកទី៩ ដែលជាសមាជិកចុងក្រោយទេ។ លោកបានមានប្រសាសន៍ថា "សម្រាប់មនុស្សជាច្រើនវាពិតជាចម្លែកណាស់ខុសពីធម្មតាខ្លាំងណាស់ ហើយវាមិនពិតទេ ដែលថា យើងមិនអាចព្រមព្រៀងគ្នាក្នុងការជ្រើសរើសបេក្ខជនមួយរូប ពីព្រោះបេក្ខជនទី៩ គឺជាបេក្ខជនធម្មតារបស់គណបក្សទាំងពីរ"។

គណៈកម្មាធិការជាតិរៀបចំការបោះឆ្នោតបច្ចុប្បន្នមានសមាជិកភាគច្រើនមកពីគណបក្សប្រជាជនកម្ពុជា ហើយបានទទួលរងការរិះគន់ជាប់ជានិច្ចពីអ្នកឃ្លាំមើលការបោះឆ្នោតឯករាជ្យចំពោះការមិនរៀបចំការបោះឆ្នោតដោយយុត្តិធម៌។

លោក ព្រុំ សុខា រដ្ឋលេខាធិការក្រសួងមហាផ្ទៃដែលបានចូលរួមការចរចាកាលពីម្សិលមិញ និងបានដឹកនាំកិច្ចចរចាផ្នែកបច្ចេកទេសជាមួយគណបក្សសង្គ្រោះជាតិក្នុងរយៈពេលប៉ុន្មានខែថ្មី១នេះបានមានប្រសាសន៍ថា គណបក្សរបស់លោកមិនបារម្ភអំពីការជាប់គាំងនៅក្នុងការជ្រើសរើសសមាជិកទី៩នៃគណៈកម្មាធិការរៀបចំការបោះឆ្នោតថ្មីនេះទេ។

លោកបានមានប្រសាសន៍ថា "ប្រសិនបើដំណើរការនេះជាប់គាំងដោយសារមិនមានការព្រមព្រៀងគ្នាលើបេក្ខជនណាមួយនោះយន្តការដែលមានស្រាប់ គឺគ.ជ.ប. បច្ចុប្បន្ននឹងធ្វើការជាធម្មតា។ នេះគឺជាកិច្ចព្រមព្រៀង។ យន្តការដែលមានស្រាប់នេះ គឺដើម្បីការពារមិនឱ្យមានការជាប់គាំង"។

លោក ព្រុំ សុខា ក៏បានមានប្រសាសន៍ដែរថា តំណាងរាស្ត្រជាប់ឆ្នោតគណបក្សសង្គ្រោះជាតិទាំងប្រាំពីររូបដែលបានជាប់ពន្ធនាគារកាលពីសប្តាហ៍មុន បន្ទាប់ពីអ្នកគាំទ្រគណបក្សប្រឆាំងបានវាយតប់យ៉ាងខ្លាំងកាលពីថ្ងៃទី១៥ ខែកក្កដា ទៅលើសន្តិសុខខណ្ឌដូនពេញនោះ ឥឡូវនេះនឹងមានការការពារពីការផ្តន្ទាទោស។

លោកបានមានប្រសាសន៍ថា "ពួកគាត់នឹង

តទៅទំព័រទី ១៤

# Hun Sen, Rainsy Strike Deal; CNRP to Take Seats

**By Alex Willemyns and Mech Dara | July 23, 2014**

Prime Minister Hun Sen and opposition leader Sam Rainsy emerged from a five-hour meeting in Phnom Penh on Tuesday with a deal for the CNRP's 55 lawmakers-elect to end their boycott of the National Assembly in exchange for an overhaul of the electoral commission, which they accuse of rigging last year's election for the CPP.

The seven CNRP lawmakers-elect, along with one party activist, who were imprisoned last week on

The CNRP's lawmakers-elect will be sworn in at the National Assembly in the coming week, according to Mr. Rainsy, where they will join 68 parliamentarians from the CPP to amend the Constitution in order to enshrine the autonomy of a new election commission.

seemingly spurious charges of "leading an insurrection" were also released Tuesday in order to allow them to swear into the National Assembly.

A statement issued by the parties after the meeting said the new electoral commission will have nine members: four selected by the CPP, four by the CNRP and a ninth selected by consensus. The selections will be made through the National Assembly standing committee.

Mr. Rainsy said shortly after the meeting that the arrangement will be clearly detailed in the Constitution and form much of the document's new Chapter 15.

"The Constitution will specify how the ninth [member] will be chosen. The CNRP will approve at least four, the CPP must approve four and the ninth member must be approved by both parties," he said.

The opposition leader discounted the possibility of further discord between the parties over the selection of the ninth and final member.

"Among so many people it would [be] very strange, very unusual and unlikely that we could not agree on one candidate because the ninth candidate will be the common candidate of both parties," he said.

The present National Election Committee (NEC) is dominated by members of the CPP and has been routinely criticized by independent election monitors for its failures to hold fair elections.

Interior Ministry Secretary of State Prum Sokha, who was at Tuesday's meeting and has led technical talks with the CNRP in recent months, said his party was not concerned about a deadlock in selecting the ninth member of the new commission.

"If the process is stuck by not having consensus on any one candidate, the existing mechanism, the existing NEC, shall proceed normally. This is the agreement. This is to protect against deadlock," he said.

Mr. Sokha also said the seven CNRP lawmakers-elect imprisoned last week after opposition supporters on July 15 violently retaliated against Daun Penh district security guards will now be protected against any prosecution.

"They will be released temporarily, on bail, to let them swear in, and then the National Assembly will consider their immunity and ask the court to drop the case. But we need to get through that legal process," he said.

CNRP lawmakers-elect Mu Sochua, Keo Phirum, Men Sothavrin, Ho Vann, Real Camerin, Nuth Rumduol and Long Ry, and party activist Oeur Narith, were released from prison just before 5 p.m. Tuesday and led a motorcade back to CNRP headquarters in Meanchey district.

CNRP spokesman Yim Sovann declined to specify when the party's lawmakers would swear in, but confirmed they would do so before the members of the new electoral commission are chosen.

"We have to amend the Constitution and amend the law. In order to amend the Constitution we have to have the meeting," he said.

A two-thirds majority of the 123-member National Assembly is required to amend the Constitution, requiring the

**Continued to page 24**

ឌឹ ខេមបូឌា ដេលី The Cambodia Daily

ដំណឹងប្រែសម្រួលពីកាសារអង់គ្លេស អត្ថបទដកស្រង់ និងទទួលការអនុញ្ញាតឱ្យធ្វើការចុះផ្សាយពី ឌឹ ខេមបូឌា ដេលី ច្បាប់ចេញផ្សាយថ្ងៃ សុក្រ ទី២៥ ខែកក្កដា ឆ្នាំ២០១៤

# ការជន់លិចរាំរ៉ៃនៅក្រុងភ្នំពេញមិនមានសញ្ញាធូរស្បើយ

**ដោយ : សេក ឧត្តម** | July 23, 2014

ក្រុមមន្ត្រីបាននិយាយកាលពីម្សិលមិញថា ប្រជាពលរដ្ឋរស់នៅក្នុងក្រុងភ្នំពេញគួរបន្តត្រៀមទប់ទល់នឹងការជន់លិចថែមទៀតអំឡុងរដូវភ្លៀងឆ្នាំនេះ ពីព្រោះមិនឃើញមានសភាពធូរស្រាលណាមួយនៅឡើយ ។

ក្នុងពេលដែលយានយន្តគ្រប់ប្រភេទនាំគ្នាបើកបរតែលើផ្លូវសំខាន់ៗ ដើម្បីគេចចេញពីផ្លូវជន់លិច ។

លោក ឡុង ឌីម៉ង់ អ្នកនាំពាក្យសាលារាជធានីភ្នំពេញបានបន្ទោសប្រជាជនថា បានធ្វើឱ្យស្ទះលូបង្ហូរទឹកដោយការចោលសំរាម ឬបិទបំពង់លូទឹកសម្អុយដើម្បីចៀសវាងក្លិនស្អុយ ។

កាលពីខែសីហាឆ្នាំមុនសាលារាជធានីភ្នំពេញបានធ្វើយុទ្ធនាការមួយឱ្យប្រជាជនចោលសំរាមឱ្យបានត្រឹមត្រូវ ដើម្បីសម្រាលការជន់លិចរាំរ៉ៃនៅរដូវភ្លៀង ។ **តទៅទំព័រទី ២៧**




ការជន់លិចនេះបានធ្វើឱ្យប៉ះពាល់មួយភាគធំនៃទីក្រុងបន្ទាប់ពីភ្លៀងធ្លាក់មួយមេធំកាលពីរសៀលម្សិលមិញ ដោយបានបង្កឱ្យមានការស្ទះចរាចរណ៍ក្នុងពេលដែលយានយន្តគ្រប់ប្រភេទនាំគ្នាបើកបរតែលើផ្លូវសំខាន់ៗ ដើម្បីគេចចេញពីផ្លូវជន់លិច ។

# No End in Sight for Chronic Phnom Penh Flooding

**By Sek Odom | July 23, 2014**

Phnom Penh residents should continue to brace for more flooding during this rainy season with no imminent fix in sight, officials said Tuesday.

Flooding impacted much of the city as heavy rains fell Tuesday afternoon, causing traffic jams as motorists flocked to major thoroughfares in order to avoid smaller roads with poor drainage.

City Hall spokesman Long Dimanche blamed residents for adding to the problem by blocking drains with trash or closing off manholes to avoid bad smells.

Phnom Penh Municipality last August launched a campaign to encourage people to discard their waste correctly in an effort to alleviate chronic rainy season flooding.

As part of the campaign, City Hall also pledged to clean the city's drainage system three times this rainy season to reduce about 70 percent of the flooding caused by blockages.

**Continued to Page 25**

# As Prices Fall, Rat Hunting's Few Charms Fade

**By Mech Dara and Holly Robertson | July 15, 2014**

Just after sunrise in the slums surrounding the Stung Meanchey dump, Lak Han, 45, sits in the dirt outside his home methodically chopping up a large pile of rodents.

For many years, like hundreds of others at the dumpsite, Mr. Han made a paltry living collecting scraps of garbage until he turned to a more lucrative source of income-hunting rats.

At about 7 p.m. every evening, dozens of rat catchers make their way from the dumpsite into central Phnom Penh where, as residents are well aware, there is an abundance of large rodents for them to target.Among them is Mr. Han, who scours the areas around major marketplaces-where discarded waste attracts vermin-to find his fast-moving prey.



Rat hunter Lak Han prepares several kilograms of rats outside his home at the Stung Meanchey dumpsite. (Holly Robertson/The Cambodia Daily)



Rat catcher Chea Oun, 31, fillets rats along with two female relatives at the Stung Meanchey dump last week. (Holly Robertson/The Cambodia Daily)

When he comes across a furry, gray rodent, he must move quickly to pierce it with a homemade wooden spear with a fine metal point on the end.

"We use a spear to stab the rats," he said. "We flash our flashlights at them and then we stab them.

"Afterwards they are still alive so we hit them until they die and we keep them in our bags."

Mr. Han spends most nights prowling the city's streets, before returning to his metal shack at the dumpsite by 6 a.m. to begin preparing the rat meat.

According to Stung Meanchey residents, the meat is trucked to Poipet City and then taken across the border to Thailand, where it is processed for human consumption.

"After we hunt them we chop off their heads, skin them, and remove their insides, but we do not have to clean them since they are stored in ice," Mr. Han explained on Friday morning as he prepared the

**Continued to Page 25**

តមកពីទំព័រទី ១២ លោក ហ៊ុន សែន និងលោក សម រង្ស៊ី ....

ត្រូវដោះលែងឱ្យនៅក្រៅឃុំបណ្ដោះអាសន្ន ដើម្បីអនុញ្ញាតឱ្យពួកគាត់ស្បថចូលកាន់តំណែង ហើយបន្ទាប់មករដ្ឋសភានឹងពិចារណាពីអភ័យឯកសិទ្ធិរបស់ពួកគាត់ ហើយស្នើសុំឱ្យតុលាការបញ្ចប់រឿងក្ដីនេះ។ ប៉ុន្តែយើងត្រូវធ្វើតាមនីតិវិធីច្បាប់"។

តំណាងរាស្ដ្រជាប់ឆ្នោតគណបក្សសង្គ្រោះជាតិ គឺលោកស្រី មូរ សុខហួរ លោក កែវ ភិរម្យ លោក ម៉ែន សុថាវរិន្ទ្រ លោក ហូរ វ៉ាន់ លោក វៀល ខេមរិន្ទ្រ លោក នុត រុំដួល និងលោក ឡុង រី ព្រមទាំងលោក អឿ ណារិទ្ធ ជាសកម្មជនគណបក្សត្រូវបានដោះលែងពីពន្ធនាគារមុនម៉ោង៥ល្ងាចបន្តិច កាលពីម្សិលមិញហើយបានដឹកនាំក្បួនរថយន្តត្រឡប់ទៅកាន់ទីស្នាក់ការគណបក្សសង្គ្រោះជាតិនៅក្នុងខណ្ឌមានជ័យ។

លោក យឹម សុវណ្ណ អ្នកនាំពាក្យគណបក្សបានបដិសេធមិនបញ្ជាក់ថា តំណាងរាស្ដ្រគណបក្សសង្គ្រោះជាតិនឹងស្បថចូលកាន់តំណែងនៅពេលណាទេ ប៉ុន្តែលោកបានបញ្ជាក់ថា ពួកគាត់នឹងស្បថចូលកាន់តំណែងមុនពេលជ្រើសរើសសមាជិកគណៈកម្មាធិការរៀបចំការបោះឆ្នោតថ្មី។ លោកបានមានប្រសាសន៍ថា "យើងត្រូវធ្វើវិសោធនកម្មរដ្ឋធម្មនុញ្ញ និងធ្វើវិសោធនកម្មច្បាប់។ ដើម្បីធ្វើវិសោធនកម្មរដ្ឋធម្មនុញ្ញយើងត្រូវមានកិច្ចប្រជុំ"។

ដើម្បីធ្វើវិសោធនកម្មរដ្ឋធម្មនុញ្ញតម្រូវឱ្យមានសំឡេង២ភាគ៣ពី សមាជិករដ្ឋសភាដែលមាន១២៣រូប ដែលតម្រូវឱ្យមានការចូលរួមពីគណបក្សសង្គ្រោះជាតិ។

លោក សម រង្ស៊ី ដែលត្រូវបានហាមឃាត់មិនឱ្យឈរឈ្មោះបោះឆ្នោតកាលពីឆ្នាំមុននឹងមិនមែនជាតំណាងរាស្ដ្រជាប់ឆ្នោតនោះ បានមានប្រសាសន៍ថា លោកកំពុងរៀបចំចូលគាល់ព្រះមហាក្សត្រនរោត្តម សីហមុនី នៅសប្ដាហ៍នេះ ដើម្បីស្នើឱ្យតំណាងរាស្ដ្ររបស់លោកបានស្បថចូលកាន់តំណែង។

លោកបានមានប្រសាសន៍ថា "មានគម្រោងហើយ ប៉ុន្តែវាមិនទាន់ច្បាស់ទេ ខ្ញុំអាចនិយាយបានថា នៅចុងសប្ដាហ៍នេះ យើងនឹងចូលគាល់សម្ដេចម៉ែ និងព្រះមហាក្សត្រ។ ព្រះមហាក្សត្រប្រហែលជាអនុញ្ញាតឱ្យយើងចូលគាល់នៅសប្ដាហ៍នេះ។ បន្ទាប់ពីសប្ដាហ៍នេះទៅមួយថ្ងៃ ឬពីរបីថ្ងៃក្រោយមកយើងនឹងទៅស្បថចូលកាន់តំណែងនៅព្រះបរមរាជវាំង"។

លោក ព្រុំ សុខា បានមានប្រសាសន៍ថា លោកជឿថា តំណាងរាស្ដ្រជាប់ឆ្នោតទាំង៥៥រូប របស់គណបក្សសង្គ្រោះជាតិនឹងស្បថចូលកាន់តំណែងក្នុងពិធីពិសេសមួយនៅថ្ងៃសុក្រ។

តាមកិច្ចព្រមព្រៀងថ្មីនេះ គណបក្សសង្គ្រោះជាតិនឹងកាន់តំណែងប្រធានគណៈកម្មការចំនួនប្រាំនៅរដ្ឋសភា រួមទាំងគណៈកម្មការថ្មីប្រឆាំងអំពើពុករលួយផងដែរ រីឯគណបក្សប្រជាជនកម្ពុជានឹងកាន់តំណែងជាប្រធានគណៈកម្មការប្រាំទៀត។

គណបក្សប្រជាជនកម្ពុជានឹងរក្សាតំណែងប្រធានរដ្ឋសភា និងអនុប្រធានទី២ ប៉ុន្តែគណបក្សសង្គ្រោះជាតិនឹងតែងតាំងអនុប្រធានទី១របស់រដ្ឋសភា។ លោក អេង ឆៃអ៊ាង ដែលនឹងស្បថចូលកាន់តំណែងជាតំណាងរាស្ដ្រគណបក្សប្រឆាំងមណ្ឌលកណ្ដាលបានមានប្រសាសន៍ថា លោក កឹម សុខា អនុប្រធានគណបក្សសង្គ្រោះជាតិនឹងត្រូវជ្រើសរើសដោយគណបក្សឱ្យធ្វើជាអនុប្រធានទី១របស់រដ្ឋសភា។ លោកបានមានប្រសាសន៍ថា "នៅក្នុងឋានានុក្រមគណបក្សឯកឧត្ដម សម រង្ស៊ី គឺជាបេក្ខជននាយករដ្ឋមន្ត្រី ហើយលោក កឹម សុខា ជាបេក្ខជនសម្រាប់តំណែងប្រធានរដ្ឋសភា។ ដូច្នេះនៅពេលមានតំណែងនៅក្នុងរដ្ឋសភាលោក កឹម សុខា ត្រូវទទួលយកតំណែងនោះ"។

យោងតាមកិច្ចព្រមព្រៀងនេះ គណបក្សប្រជាជនកម្ពុជានឹងបាត់បង់តំណែងខ្លះនៅក្នុងគណៈកម្មាធិការអចិន្ត្រៃយ៍រដ្ឋសភា ដែលជាអ្នកកំណត់របៀបវារៈរបស់រដ្ឋសភា និងមានសមាជិកជាប្រធានរដ្ឋសភាអនុប្រធានរដ្ឋសភាទាំងពីររូប និងប្រធានគណៈកម្មការទាំង១០។

ដោយលើកឡើងពីបទបញ្ជាផ្ទៃក្នុងដែលហាមឃាត់តំណាងរាស្ដ្រមិនឱ្យធ្វើជាសមាជិករបស់គណបក្សពីរនៅពេលតែមួយនោះ គណៈកម្មាធិការអចិន្ត្រៃយ៍បានបណ្ដេញតំណាងរាស្ដ្រទាំងអស់មកពីគណបក្ស សម រង្ស៊ី និងគណបក្សសិទ្ធិមនុស្សចេញពីរដ្ឋសភានៅមុនការបោះឆ្នោតកាលពីឆ្នាំមុនបន្ទាប់ពីគណបក្សទាំងពីរបានបញ្ចូលគ្នាទៅជាគណបក្សសង្គ្រោះជាតិ។

បន្ទាប់មកគណបក្សប្រឆាំងដែលរួមបញ្ចូលគ្នានេះ បានធ្វើឱ្យគណបក្សប្រជាជនកម្ពុជាដែលកាន់អំណាចយូរមានការភ្ញាក់ផ្អើលចំពោះការទទួលបានអាសនៈ៥៥ នៅក្នុងការបោះឆ្នោតកាលពីខែកក្កដា ឆ្នាំ២០១៣ ដែលដល់ខួបនៅថ្ងៃច័ន្ទ និងបានធ្វើបាតុកម្មប្រឆាំងរដ្ឋាភិបាលរាប់ខែនៅក្នុងទីក្រុងភ្នំពេញ ដើម្បីទាមទារឱ្យមានការស៊ើបអង្កេតលើការបោះឆ្នោតនេះ ឬធ្វើការបោះឆ្នោតសាជាថ្មី។

តាមកិច្ចព្រមព្រៀងកាលពីម្សិលមិញការបោះឆ្នោតនឹងមិនមានការផ្លាស់ប្ដូរច្រើនទេ ប៉ុន្តែបានបង្ហាញពីការធ្វើសម្បទានច្រើនពីគណបក្សសង្គ្រោះជាតិ។ ចាប់តាំងពីខែធ្នូមកគណបក្សនេះបានទាមទារឱ្យរៀបចំការបោះឆ្នោតលើកក្រោយឱ្យបានមុនខែកក្កដា ឆ្នាំ២០១៨។

នៅឯសន្និសីទកាសែតបន្ទាប់ពីបញ្ចប់ការចរចានេះ លោក ព្រុំ សុខា បានមានប្រសាសន៍ថា កាលបរិច្ឆេទនៃការបោះឆ្នោតនឹងមានការផ្លាស់ប្ដូរបន្តិចបន្តួច។ លោកបានមានប្រសាសន៍ថា "គណបក្សទាំងពីរព្រមព្រៀងកំណត់កាលបរិច្ឆេទថ្មីសម្រាប់ការបោះឆ្នោតនៅពេលអនាគត ប៉ុន្តែមិនមែនសម្រាប់ការបោះឆ្នោតមុនអាណត្តិទេ"។

ចាប់តាំងពីខែកញ្ញាមកគណបក្សប្រជាជនកម្ពុជាបាននិយាយថា **តទៅទំព័រទី ២៧**

# ជនជាតិខ្មែរដំបូងបំផុតដែលរស់នៅក្រុងឡូវែល

ដោយៈ រីឆាដ ហូវ

*៦សីហា ឆ្នាំ២០១៣*

*ប្រែសម្រួលដោយ ហេង លីមហ៊ាង*

៥០ឆ្នាំកន្លងទៅប្រជាជនក្នុងតំបន់ឡូវែលមិនសូវស្គាល់ជនជាតិនៃភូមិភាគអាស៊ីអាគ្នេយ៍ប៉ុន្មានឡើយ។ ក្រោយមកបុរសវ័យក្មេងម្នាក់ត្រូវបានចាត់តាំង និងបញ្ជូនឱ្យទៅច្បាំងក្នុងសង្គ្រាមក្នុងប្រទេសវៀតណាម ហើយមួយចំនួនបានពលិកម្មជីវិតក្នុងសង្គ្រាម។ ផ្លូវ អ័រខិន ដ្រៃវី (Arcand Drive) ជាផ្លូវដែលគិតចាប់ពីសាលាក្រុងឡូវែល City Hall ទៅសុងហ្គាសអារេណា Tsongas Arena ។ ឈ្មោះផ្លូវអ័រខិន ដ្រៃវី (Arcand Drive) នេះ គឺយកតាមឈ្មោះនាយទាហាន ភី អេហ្វ ស៊ី ដូណល អ័រខិន PFC Donald Arcand ដែលបានស្លាប់នៅអាយុ២០ឆ្នាំ ពេលដែលឧទ្ធម្ភាចក្រយោធារបស់លោកត្រូវបានបាញ់ទម្លាក់នៅថ្ងៃទី១ ខែកញ្ញា ឆ្នាំ១៩៦៥។ សួនខាឡឺរី ឬ (Callery Park) តាមបណ្ដោយផ្លូវស្ទេវិន (Stevens) និង វ៉ាលឌឺ (Wilder) នៅសង្កាត់ ហៃឡេន (High Land) ត្រូវបានដាក់ឈ្មោះដោយយកតាមឈ្មោះរបស់លោក វីល្លៀម ធី . ខាឡឺរី (William T. Callery) ដែលបានស្លាប់ក្នុងអគ្គិភ័យ នាថ្ងៃទី២២ខែកុម្ភៈ ឆ្នាំ ១៩៩៦ នៅអាយុ ២១ឆ្នាំ។

នៅពេលដែលសង្គ្រាមរវាងអាមេរិក និងវៀតណាមត្រូវបានបញ្ចប់ក្នុងអំឡុងឆ្នាំ១៩៧០ ប្រជាជនក្នុងតំបន់ឡូវែលគិតថា អនាគតនៃទំនាក់ទំនងរវាងឡូវែល និងអាស៊ីអាគ្នេយ៍អាចនឹងជានិមិត្តរូបនៃការប្រាស្រ័យទាក់ទងរវាងជាតិទាំងពីរនេះ ដើម្បីរំឭកដល់អ្នកដែលបានស្លាប់ក្នុងគ្រានោះ។

ជនភៀសខ្លួនដំបូងដែលមកពីភូមិភាគអាស៊ីអាគ្នេយ៍មកដល់តំបន់ឡូវែលចុងឆ្នាំ១៩៧០។ ភាគច្រើននៃអ្នកទាំងនោះជាជនជាតិវៀតណាម តែខ្លះជាឡាវ និងខ្លះទៀតជាខ្មែរ។ ការធ្វើជំរឿនប្រជាជននៅឆ្នាំ១៩៨០ នៅតំបន់ឡូវែលបានឱ្យឃើញថា មានត្រឹម២ទៅ៣នាក់ប៉ុណ្ណោះក្នុងចំណោម១០០នាក់ ដែលមកពីភូមិភាគអាស៊ីអាគ្នេយ៍ដែលរស់នៅក្នុងតំបន់ឡូវែល។ មនុស្សមួយក្រុមតូចពីភូមិភាគអាស៊ីអាគ្នេយ៍ដែលមកដល់ឡូវែលដំបូងគេបង្អស់ជាប្រភពដ៏សំខាន់។ ទោះជាយ៉ាងណាក៏ដោយមិនយូរប៉ុន្មាន ក៏មានសេចក្ដីត្រូវការក្នុងការបង្កើតឱ្យមានការប្រកបរបរជំនួញតូចៗសមាគមបម្រើប្រយោជន៍សហគមន៍វត្តអារាម និងមជ្ឈមណ្ឌលផ្សេងៗទៀត ដើម្បីជ្រោមជ្រែងសហគន៍នៃជនអន្តោប្រវេសន៍ទាំងនេះ។ ជាច្រើនឆ្នាំបន្តបន្ទាប់មកទៀត ម្ដងបន្តិចៗលំហូចូល នៃជនជាតិខ្មែរ និងឡាវ មានសម្ទុះគួរឱ្យកត់សម្គាល់។

ក្នុងឆ្នាំ១៩៨៦លំហូរចូលនេះ មានកាន់តែច្រើនឡើង។ "អច្ឆរិយម៉ាសាឈូ សេត" ឬ "Massachusetts Miracle" បានឃើញកំណើនសេដ្ឋកិច្ចនៃរដ្ឋនេះ ខណៈដែលរដ្ឋផ្សេងៗក្នុងសហរដ្ឋអាមេរិកទទួលរងញាំញីដោយកំណើននៃភាពអត់ការងារធ្វើ។ ម្ល៉ោះហើយជនភៀសខ្លួនមកពីភូមិភាគអាស៊ីអាគ្នេយ៍ដែលបានតាំងលំនៅក្នុងរដ្ឋផ្សេងៗប្រញាប់ប្រញាល់ផ្លាស់ប្ដូរលំនៅរបស់ខ្លួនមកតាំងនៅតំបន់ឡូវែលវិញ ព្រោះជាកន្លែងសំបូរដោយការងារព្រមទាំងមានសហគន៍ខ្មែរតាំងនៅតំបន់នោះរួចជាស្រេច។

ក្នុងឆ្នាំ១៩៨៧ ការធ្វើស្ថិតិតាមរបៀបមុនៗបានបង្ហាញថា អ្នកតាំងលំនៅអចិន្ត្រៃយ៍ក្នុងតំបន់ឡូវែលចំនួន៣០០០នាក់ មកពីប្រទេសឡាវ និងច្រើនជាងមួយម៉ឺនប្រាំបីពាន់នាក់ (១៨០០០នាក់) មកពីព្រះរាជាណាចក្រកម្ពុជា (ប្រទេសខ្មែរ)។ តួរលេខក្រោយមកទៀត នៃចំនួនប្រជាជនខ្មែរនៅឡូវែលមានប្រមាណបីម៉ឺននាក់ (៣០០០០ នាក់) និងអាចច្រើនជាងនេះ។ ទន្ទឹមនឹងភាពសំបូរនៃការងារកំណើនដ៏ខ្ពស់នៃអ្នកតាំងលំនៅថ្មីក្នុងពេលដ៏ប្រថុចញ៉ុចបានបង្កើតឱ្យមានបញ្ហាលំបាកមួយចំនួនដល់ប្រជាជនរស់នៅទីនោះ ពិសេសគឺថ្លៃជួលផ្ទះ។ តែបញ្ហាសំខាន់មួយទៀត ចោទឡើងក្នុងសាលាសាធារណៈនានា ក្នុងតំបន់ឡូវែលត្រូវជួបនឹងឧបសគ្គក្នុងការស្វែងរកគ្រូបង្រៀននិយាយពីរភាសា និងថ្នាក់រៀនទំនេរសម្រាប់ផ្ដល់ឱ្យសិស្សជាច្រើនដែលមកចុះឈ្មោះរៀនរាល់សប្ដាហ៍។

នៅដើមឆ្នាំ១៩៨៧ មន្ទីរអប់រំរបស់រដ្ឋបានផ្ដល់នូវជំនួយឧបត្ថម្ភភ្លាមៗ និងអនុញ្ញាតឱ្យកូនសិស្ស១៦០នាក់ ដែលនិយាយពីរភាសា គឺអាស៊ី និងអេស្ប៉ាញឱ្យប្រើប្រាស់ថ្នាក់រៀននៅ វ៉ាយ អ៊ឹម ស៊ី អេ (YMCA) និងនៅដឹបយស័ខ្លឹប (The Boys Club) ដើម្បីឱ្យកូនសិស្សទាំងនោះ ទទួលបាននូវការប្រើប្រាស់សម្ភារៈបរិក្ខាក្នុងសាលាឱ្យដូចសាលាទូទៅដទៃទៀតនៅពេលដែលគេផ្ដើមចូលរៀន ។ ខាងរដ្ឋនៃសហរដ្ឋអាមេរិកក៏ទាមទារឱ្យក្រុងឡូវែលបង្កើតប្រព័ន្ធអប់រំមជ្ឈមណ្ឌលមួយដែលផ្ដោតការចាប់អារម្មណ៍ទៅលើការប្រកាន់ពូជសាសន៍ដែលរីកសាយធំឡើងក្នុងប្រព័ន្ធអប់រំដែលមានក្នុងក្រុងឡូវែល។

គណៈកម្មាធិការក្នុងសាលាព្រមទាំងមាតាបិតាសិស្សមួយក្រុមតូចដែលភាគច្រើនមានជាតិកំណើតអេស្ប៉ាញបដិសេធក្នុងការអនុម័តនូវគម្រោងនេះ។ ប៉ុន្តែអាស្រ័យដោយការគាំទ្រពីសំណាក់ជនជាតិមកពីភូមិភាគអាស៊ីអាគ្នេយ៍ និងមន្ទីរយុត្តិធម៌អាមេរិកបានដាក់ពាក្យបណ្ដឹងទល់នឹងក្រុងឡូវែលនៅតុលាការសហព័ន្ធ។

ខណៈដែលសំណុំរឿងត្រូវបានពន្យារពេលនៅបរវេសនកាលឆ្នាំ១៩៨៧ប្រជាជនក្នុងក្រុងឡូវែលបោះឆ្នោតជ្រើសរើសគណៈកម្មាធិការថ្មីក្នុងសាលា។ ក្នុងរយៈពេលដ៏ខ្លីការប្រាស្រ័យទាក់ទងរវាងមាតាបិតាសិស្សនៃក្រុមជនជាតិភាគតិចដូចជាខ្មែរ ឡាវ និងប្រព័ន្ធសាលារដ្ឋចាប់ផ្ដើមប្រសើរឡើង។ បន្ទាប់ពីការចរចាដ៏យូរបណ្ដឹងត្រូវបានដោះស្រាយ តទៅទំព័រទី ១៨




Higher proportion (%) of Asian population and Asian-owned businesses in Lowell than in Massachusetts

# The early Cambodian residents of Lowell

By Richard P. Howe Jr.
August 6, 2013



Richard Howe

Fifty years ago people in Lowell knew little about Southeast Asia but then young men from here were drafted and sent to fight in Vietnam. Some of them died there. Arcand Drive, which runs from Lowell City Hall to the Tsongas Arena, is named for PFC Donald Arcand who died at age 20 when his Army helicopter was shot down on September 1, 1965. Callery Park, which lies between Stevens and Wilder Streets in the Highlands, is named for William T. Callery who was killed by hostile fire on February 22, 1966. He was 21.

When America's involvement in the Vietnam War ended in the 1970s, people in Lowell assumed that the only future connection between the city and Southeast Asia would be the local monuments and plaques erected in memory of those who died there. No one imagined how wrong that assumption would prove to be.

The first refugees from Southeast Asia arrived in Lowell in the late 1970s. They were mostly from Vietnam but some were from Laos and Cambodia. A 1980 census found fewer than 100 people from Southeast Asia living in Lowell. That early group was resourceful, however, and quickly established small businesses, community support organizations, a temple and the other things needed to create a thriving immigrant community. Over the years, a small but steady stream of Cambodians and Laotians came to Lowell.

In 1986, however, that stream became a flood. The "Massachusetts Miracle" saw this state's economy booming while the rest of the country suffered from high unemployment and economic stagnation. Southeast Asian refugees who had settled in other parts of America were soon moving to Lowell, attracted by plentiful jobs and the already vibrant Cambodian community in the city.

By 1987, conservative estimates held that Lowell's residents included 3,000 people from Laos and more than 18,000 from Cambodia. Later estimates said that number was as high as 30,000. While there were plenty of jobs, such a large number of new residents arriving in such a short time created strains on people and resources, especially rental housing. But the greatest impact was on the Lowell public schools which struggled to find space and bilingual teachers for the dozens of new students who were enrolling each week.

In early 1987, the state department of education granted an emergency waiver that allowed Lowell to place 160 bilingual students, both Hispanic and Asian, in rented rooms at the YMCA and the Boys Club on the condition that the city would bring those students into regular facilities at the beginning of the new school year. The state also demanded that the city implement a central enrollment system that would begin to address the racial segregation that had arisen in the Lowell school system.

The school committee refused to adopt such a plan and so a group of parents, mostly Hispanic but with the support of many Southeast Asians and the U.S. Department of Justice, filed a lawsuit against the city in federal court.

While that lawsuit was pending, the people of Lowell in the fall of 1987 elected several new school committee members. Almost immediately, relations between the minority parents and the public school system began to improve. After countless hours of negotiations, the lawsuit was settled and the city adopted a central enrollment system that would desegregate the schools. As a result of this plan being adopted, Lowell moved to the top of the state's school building assistance program and by the early 1990s, more than a dozen brand new schools had been built with the state paying 90% of the cost.

Today, Cambodian people are an integral part of the Lowell community and for many, the events of 1987 seem like ancient history. But it is important to understand that things might have ended differently if many people of good will from all groups had not come together and struggled for outcomes that were in the best interest of all residents of Lowell. It is a lesson worth remembering today.

## Middlesex Street, Lowell, MA 01851

**677**
Advance Auto Center
978-275-9896
Automotive Autobody center
Lion New+Used Furniture
Boys and Girls Club
Lowell Police Department
Clemente Park Chiropractic
978-937-1492
Katie Kars
978-458-7499

**650**
Friendship Auto Repair
978-710-0775

**660**
Le Petit Café
978-459-5999
Cheysar. Driving School
978-423-1931
Torpi Travel
978-332-1797
7 Video
978-710-6356
New Phnom Pech Jewelry
978-866-4129

**692**
P&P Jewelry
978-453-3877

**704**
Mony Var Insurance Agency
978-452-1390

**706**
New Pailin Jewelry
978-937-5885

**716**
Angkor Hair Design
978-970-0053
Amara Travel
978-674-8173
Red Rose Restaurant
978-452-5400
Morning Star
978-710-6598

**717**
Phnom Pech Jewelry
978-710-4844

**733**
Apsara Jewelry
978-452-5367

**735**
Anie Beauty Salon
978-674-8216

**1126**
Augusta G. Dickson law office
978-937-2666
Video rental That luang
508-970-2376
Fas Track Physical Therapy
978-459-4445
Video World
978-902-4588
Golden Century Real estate
978-454-4470



## Carlton Street, Lowell, MA 01852

**14**
Ourb's Auto Repair& Towing
978-866-0427

## Dutton Street, Lowell, MA

**505-509**
Frozen Yogurt
Hong Cuc
978-441-0110
Lim Nini Seafood
978-937-5307

## Westford Street, Lowell, MA 01851

**36**
Bpi insurance and Income tax
978-452-0150

**51**
Tech Heng Auto
978-453-0144

**268-296**
K. Market
978-656-8436
Asian Jewelry
978-441-3909
P&H Auto Repair
978-441-9454
Hong Kong super Market
978-452-7391
Ideal Global Solution, LLC
978-944-4182

**301-345**
Neak Pich Souvenir-Art-Craft
978-452-6254
Dep Beauty Salon
978-454-1022
Lowell Package Store INC
(Hong Kong Market)
978-452-0715
Mongkot Pich Beauty Salon
978-937-3096
Phnom Penh Restaurant
978-275-0999
Bayon Jewelry
978-454-5278
Som's Barber Stylist

**978-970-3809**
Rachana Jewelry
978-458-8939
Reaksmey Salon
978-323-4548
Captain John's Rest.
978-458-0752
Lico Wirless
lico.wireless337@yahoo.com
Fineberg.Gray Associates
978-452-5003




## Branch Street, Lowell, MA 01851

**6**
Pailin Karaoke
978-390-2161
New Happiness Restaurant
978-454-4727

**32**
Le Hair Salon
978-937-9901
Heng Heng Fast Food
978-275-3895
Magic Wireless & General Services
978-674-8181

**186-278**
Variety
978-441-0979
CPU Computer service
978-884-1745
Kim's Beauty Salon
978-735-4967
Country Farm Convenience store
Peephuptmei Restaurant
978-937-2919

## Pine Street, Lowell, MA 01851

**4-6**
Lucky Asian Market
978-934-9999
Tepniyum Band
978-328-9335
Sophea Bridal
978-328-9335
LVP-Professional
High Quality Video-Photo
978-328-9335

**16**
Beschip PC&Network
978-452-1803
Sovann Ou-Honorary Consul General
978-735-4539
Global Reality Network LLC
617-459-3000
Louis S. Haskell Attorney at Law
978-459-8359

## Chelmsford Street, Lowell, MA01851

**115**
Tep Thida Khmer
Monroe Muffler, Brake , and Service
119 Gallery
Bangkok Market

Gaelic Club
Sunshine Dry Cleaners
978-453-4622
Ta Keo Salon
978-458-8008
Lucky Kim Convenience Store
Apsara Wireless and Computer
978-221-1086

**115**
Tep Thida Khmer
Monroe Muffler, Brake , and Service
119 Gallery
Bangkok Market

**207-285**
Samnang Mam, Attorney at Law
978-893-8383
Stk Cash For Gold
978-677-9346
Louis I. Pinn Insurance Agency
978-452-4748

**450-458**
Daisy Hair Salon
978-454-1102
Sompao Meas Hall
978-421-5256
Angkorthom Market
978-596-1111
Sonnyda Restaurant
T-k Nail and Spa
978-455-1873
Unique Auto Care
978-654-7423
Giant Coin- Op

638-646
Fantastic Cut
Lowell fire Fighter Credit Union
Bright Smile Dental
978-455-4039
Super Wash Laundromat

724
Bright Smiles Dental
978-455-4039
Green Bee Nail and Spa
Connector Cafe and Grill
Pailin Dental DR. Chien - Yu Hsu d.md
978-453-7800

## Sheldon Street, Lowell, MA 01851

5
Bopha Bridal Beauty
978-446-0103

## Cambridge street, Lowell, Ma 01851

24
The glory Buddhist Temple
978-458-0498
153 Hale Street
The New Glory Buddhist Temple

## Lincoln street, Lowell, MA

26
Simply Khmer Restaurant
Ranhyh's Hair and Nail
978-970-1062

## School Street Lowell, MA

624
Lowell Food Mart and Lottery

## Liberty Street, Lowell, MA

153-176
Heng lay Restaurant
978-458-4619
The 99 store

# Cambodia Town of Lowell

By Sengly Kong , Ph.D, Chairperson of Cambodia Town Committee



In 2010, the City of Lowell designated a Cambodia Town in order to officially recognize the Lowell Cambodian American community's contribution over the past three decades to revitalizing the partially blighted lower highland neighborhood and to elevate interest in the area's stores and restaurants, attract new businesses, bring in tourists, and increase civic pride.

The designation was a timely response to the aspiration of the community and businesses as reflected in their positive responses to a brief survey in early 2010 conducted by the Cambodian Mutual Assistance Association (CMAA) of the greater Lowell. In October 29, 2011, a Cambodia Town Committee, an organization of volunteers, was set up with the support of the Cambodian community and businesses; and the Committee works closely with the City and other community based organizations to advance a vision of economically, culturally vibrant and prosperous Cambodia Town of Lowell.

Lowell is home to the second largest Cambodian American community in the United States after Long Beach, California. According to Richard Howe, co-author of a book: Legendary locals of Lowell, Cambodian refugees were attracted in large numbers to Lowell by relatively plentiful jobs in the mid 1980s and the already vibrant Cambodian community in the city. According to the 2010 US Census, Lowell has about 22,000 Cambodians; however, it is widely agreed that Cambodians in Lowell were seriously undercounted. Community leaders, who live and work for decades in the community, estimated that there are approximately 35-40,000 Cambodians about one third of the city population; the estimate is quite consistent with extrapolated school enrollment data. As the result, Lowell has a large proportion (20.2%) of Asians compared to only 5.3% statewide and also has a high proportion (14.8%) of Asian-owned business versus 4.5% statewide (Census 2010).

There are at least 200 Cambodian American businesses of all sizes and kinds most of which are concentrated in the Cambodia Town. Cambodian restaurants are ubiquitous; each offers a variety of authentic ethnic dishes, and it also tends to have its signature dish based on customer preference. For example, customers usually like a sour beef stew (Samlor Machu Sach Koa) at Red Rose restaurant or roasted duck at Phnom Penh restaurant or steamed soy sauce Tilapia (Trey Cham Hoy) at Mekong restaurant or Rice Field Sour Fish Soup (Samlor Machu Srae) at Piphup Thmei restaurant. All ingredients are authentic and found at local Grocery Supper Markets: Phnom Penh Market on Branch Street, Hong Kong Market on Westford, and Bangkok Market on Chelmsford Street etc.

Authentic jewelry stores are also omnipresent throughout the Cambodia Town. You can find, for example, Asian Jewelry on Westford Street, and Phnom Pich Jewelry or Pailin Jewelry or Apsara Jewelry on Middlesex etc. You can buy necklace with lucky charmed pendant or bracelet with artistic design or earrings of Angkorian style or contemporary Cambodian fashion. During summer weekends, you can see traditional wedding receptions at Cambodian restaurants with bride and groom wearing a set of dazzling jewelries; wedding crown, costumes, and changing each set every hour throughout the evening. Traditional wedding is customarily organized in two parts; the first part isorganized in a morning at a bride's home with invited monks chanting blessings for a couple. The reception is generally held in the evening with invited guests from both sides: the bride's side and the groom's. If interested, one can also buy traditional costumes, jewelry, lucky charms, and other souvenirs at local costume and souvenirs shops throughout the Town.

Religion plays important roles in most Cambodian American life. From birth to death, Cambodians involve Buddhism one way or another. Buddhist monks are, for example, invited to chant blessing for a newborn although this practice is rare nowadays. There are usually Buddhist ceremonies throughout a year: Phjum Ben, New Year, funeral etc each of which involves monks chanting blessing. Three Buddhist temples offer religious services in Lowell; one temple, known as Glory Buddhist temple, is located in the Cambodia Town off Chelmsford Street while two others, Trairatanaram and Khmer Lowell Temple, are in neighboring community. There are score of other cultural entities that make Lowell Cambodia Town culturally vibrant. Cambodian Mutual Assistance Association provides culturally appropriate social services; Metta Health Clinic of Lowell Community Health Center provides culturally competent health-care services; Angkor Dance Troup and Tep Niyum Musical offer classical and folk dances for various occasions etc.

In sum, Cambodia Town offers great opportunities for tourists to experiences authentic cultures and for investors to invest in new businesses, and for Cambodian Americans to be proud of. Visiting the Cambodia Town of Lowell gives you not only great memorable experiences, but also help promote sustainable economic growth that would help this former refugee community to realize its vision of economically, culturally vibrant and prosperous Cambodia Town. The Lowell Cambodia Town can be easily accessible from either I-494 exit 35 A-B-C or Route 3 or I-93; it can also be accessed through a 40-minute ride by commuter rail from Boston's North Station.




តមកពីទំព័រទី ១៩ ជនជាតិខ្មែរដំបូងបំផុតដែលរស់នៅ...

ហើយក្រុងឡូវែលអនុម័តប្រព័ន្ធចុះឈ្មោះមជ្ឈមណ្ឌល (Central Enrollment System) ដែលអាចកាត់បន្ថយ និងលុបបំបាត់នូវគម្លាតជាតិសាសន៍ និងការរើសអើងក្នុងសាលា។ ជាលទ្ធផលគម្រោងនេះត្រូវបានអនុម័ត ហើយក្រុងឡូវែលវិវត្តខ្លួនជាសាលារដ្ឋដ៏ល្អបញ្ចូលកម្មវិធីជំនួយផ្សេងៗក្នុងកម្មវិធីរបស់សាលា។ ត្រឹមដើមឆ្នាំ១៩៩០ សាលាថ្មីៗជាច្រើនត្រូវបានសាងសង់ ដុះដាល ហើយចំណាយថវិការដ្ឋដល់ទៅ៩០%។

សព្វថ្ងៃនេះ ប្រជាជនខ្មែរជាល្បាយជាតិសាសន៍ដ៏ចម្បងក្នុងសហគមន៍ឡូវែល ហើយប្រវត្តិព្រឹត្តិការណ៍កើតឡើងអំឡុងឆ្នាំ១៩៨៧ទំនងក្លាយជាព្រឹត្តិការណ៍ប្រវត្តិសាស្ត្ររបស់ខ្មែរទាក់ទិននឹងក្រុងឡូវែល។ យ៉ាងណាមិញចំណុចដ៏សំខាន់ដែលគួរយល់ដឹង គឺលទ្ធផលខាងលើអាចបញ្ចប់ក្នុងរូបភាពផ្សេងពីនេះ ប្រសិនបើពុំមានការចូលរួមពីក្រុមមនុស្សនិងជាតិសាសន៍ផ្សេងៗទៀត ដែលមានឆន្ទៈល្អពួតដៃជាមួយខ្មែរ និងជនជាតិអាស៊ីអាគ្នេយ៍ផ្សេងទៀតដែលព្យាយាមតស៊ូទាមទារប្រយោជន៍ដល់អ្នករស់នៅក្នុងឡូវែល។ នេះជាករណីសិក្សា និងជាមេរៀនដ៏សំខាន់ដែល គួរចងចាំជាទីបំផុតមកដល់សព្វថ្ងៃនេះ៕

## តមកទំព័រទី ០៧ សេម សាន់ (Sam Sann) ខ្មែរតែមួយ...

ជាវិជ្ជមានដល់សហគមដែលលោករស់នៅ មានសាសន៍មិកសិកកូ និងសាសន៍ផ្សេងទៀត ដែលរស់នៅចេះស្រឡាញ់គ្នាដូចបងប្អូន។

ទាក់ទឹងជីវិតឯកជន និងជីវិតក្រុមគ្រួសារ លោក សេម សាន់ មានក្តីសោមនស្សចែករំលែកជាមួយសាពតិមានខ្មែរផុសសហរដ្ឋអាមេរិកថា លោកមានភរិយា ឈ្មោះថា ហ្គាបប៊ី (Gabby Sann) បានរៀបការជាមួយគ្នាតាំងពី២១ឆ្នាំមុន ហើយមានកូនស្រីម្នាក់ឈ្មោះថា (Amber Sann)។ លោក សេម សាន់ជាកូនខ្មែរកាត់ចិន។ លោកមានទីកន្លែងកំណើតនៅក្រុងភ្នំពេញ តែធំធាត់ឡើងរស់នៅជាមួយជីដូនក្នុងខេត្តសៀមរាប។

ឈ្មោះពិតរបស់លោក គឺ សម្បត្តិ សាន់ (Sambath Sann)។ ឪពុករបស់លោកនាម សម្រេង សាន់ ក្រោយ ប៉ុល ពល ឪពុក និងកូនបានជួបគ្នានៅកាណាដា ហើយឪពុកលោកបានទទួលមរណភាពកាលពី៥ឆ្នាំមុន។ ម្តាយនាម ឃី ប៊ុនសន បានបាត់ខ្លួនគ្មានដំណឹងដល់សព្វថ្ងៃជាមួយនឹងបងប្អូនទាំង៥នាក់ទៀត។

លោកមានក្តីប្រាថ្នាបី ទីមួយគឺចង់ស្វែងរកម្តាយ និងបងប្អូនទាំង៥នាក់ ដែលបានបាត់ខ្លួនទៅនោះ។ លោកសង្ឃឹមថា វត្តមានរបស់លោកក្នុងកញ្ចក់ទូរទស្សន៍អាចឱ្យលោកមានឱកាសបានជួបជុំជាមួយម្តាយ និងបងប្អូន ព្រោះបើពួកគេពិតជានៅរបស់ប្រាកដមែន ហើយបាន




ឃើញលោក្នុងទូរទស្សន៍ពួកគេប្រហែលជាអាចរកគ្នាឃើញ។ ទីពីរលោកសង្ឃឹមថា លោកអាចក្លាយជាអត្តរដ្ឋទូតសុឆន្ទៈនៃ American Ninja Warrior ទៅកាន់ប្រទេសជប៉ុន ឬប្រទេសផ្សេងៗទៀត។ ក្តីប្រាថ្នាទីបី គឺជ័យលាភីវគ្គផ្តាច់ព្រ័ត្រនៅឆ្នាំក្រោយ។ គួរកត់សម្គាល់ផងដែរថា ជ័យលាភីក្នុងការប្រកួតក្នុងវគ្គផ្តាច់ព្រ័ត្រនៃ American Ninja Warrior គឺ$៥00.000.00៕

## នៅប្រូវីដិន : មានកន្លែងព្យាបាលដោយមិនយកកម្រៃ នៅប្រូវីដិន សម្រាប់អ្នកមានប្រាក់ចំណូលតិច ហើយគ្មានអិនស៊ួរិន។

សូមអានបន្តជាភាសាអង់គ្លេស :



Patient is receiving free preventative quality care by volunteer providers at RI Free Clinic

Providence, RI- Rhode Island Free Clinic is accepting new patients. If you are uninsured and unable to qualify for or cannot afford health insurance through the Affordable Care Act and HealthSource RI, the Rhode Island Free Clinic may be able to help!

Rhode Island Free Clinic is a nonprofit organization dedicated to providing free, comprehensive primary and preventative care to uninsured, working poor and low-income Rhode Islanders. Clinic patients are uninsured Rhode Island adults aged 19 and older who earn below 200% of the Federal Poverty Level. Rhode Island Free Clinic is a licensed medical home where patients receive Primary Care, Specialty Care, Labs and Diagnostics, Medications, Wellness Programs and Health Education with the help of volunteer medical professionals, community partners, and donors. This Clinic does not provide urgent care or walk-in services.

To qualify you need a current picture ID, a letter or bill with your name and current Rhode Island address, and your tax return, or your most recent two pay stubs, unemployment, TDI, or SSI documents. If you have no income, you will need a letter signed by the person who is supporting you stating your current living and financial situation as proof of your financial status.

Contact: Marion Osorio, (401) 274-6347 x314, mgonzalez@rifreeclinic.org

# ហេតុអ្វីបានជាក្មេងយកឡាមឆូតមុខខ្លួន និងអារ,ដៃខ្លួន និង អារ.សាច់ខ្លួនឯង?




*និពន្ធដោយលោក ដេវីត សេង , អនុបណ្ឌិត សាស្ត្រគ្រប់គ្រងសង្គមកិច្ច*

ការធ្វើទារុណកម្មខ្លួនឯងមានច្រើនប្រភេទ ប៉ុន្តែក្នុងពេលនេះ ខ្ញុំចង់លើករឿងការដាក់ទារុណកម្មខ្លួនដោយការប្រើឡាម ឆូតមុខ,អារ.សាច់ដៃ និងអារសាច់ខ្លួនឯង ពីព្រោះខ្ញុំបានឃើញករណីនេះកើតច្រើនឡើងពេលថ្មីៗនេះក្នុងសង្គមខ្មែរ ជាពិសេសសង្គមយុវវ័យខ្មែរយើង ។

ខ្ញុំសង្ឃឹមថា ការសរសេរអត្ថបទនេះអាចជួយបានខ្លះៗពីព្រោះខ្ញុំចង់យកចំណេះខ្លះៗដែលខ្ញុំបានរៀនសូត្រ និងបទពិសោធន៍ព្យាបាលចិត្តសាស្ត្រមកជូនដល់សង្គមខ្មែរយើង ។

ការអារ.សាច់. យកឡាមឆូតមុខខ្លួនឯងគឺជារឿងចម្លែកថ្មីក្នុងសង្គមខ្មែរដែលធ្វើឱ្យឪពុកម្តាយមានការព្រួយបារម្ភ និងពិបាកចិត្តក្រៃលែងពេលមានកូនប្រព្រឹត្តអំពើនេះ ។ អំពើនេះមិនមានការប៉ុនប៉ង ធ្វើអត្តឃាតខ្លួនទេ ប៉ុន្តែបើមើលពីសំបកក្រៅហាក់បីដូចជា ចង់ប៉ុនប៉ងសម្លាប់ខ្លួនអីចឹង ហើយមានការថ្លោះធ្លោយអាចបាត់បង់ជីវិតបាន ។ ការអារ.សាច់ និងយកឡាមឆូតមុខខ្លួនឯង ដើម្បីឱ្យរំលឹករឿងអាក្រក់ ឬចង់ឱ្យការឈឺចាប់ឆាប់រលាយបាត់ទៅ ។ សាម៉ីខ្លួន គឺយកឡាមមកអារ.សាច់ឱ្យមានស្នាមរបួសតូចៗ គឺជាការបង្កើតឱ្យមានរបួសតូចៗលើរាងកាយ ភាគច្រើនលើដៃជើង ។ មនុស្សធម្មតាមិនអាចយល់ថា ហេតុអ្វីបានជាគេ ធ្វើដូច្នេះទេ ប៉ុន្តែសម្រាប់បុគ្គលប្រព្រឹត្តអំពើនេះ ការអារ.សាច់ខ្លួនឯង គឺជាការទប់អារម្មណ៍ដ៏ឈឺចាប់របស់គេឱ្យរលាយបាត់ទៅ ។



អ្នកចិត្តសាស្ត្រ និងការស្រាវជ្រាវបានឱ្យដឹងថា : ក្បួនអារ.សាច់នេះ មានជាយូរមកហើយ មិនមែនតែឥឡូវនេះ អ្នកដែលអារ.សាច់គេអាចបិទបាំងស្នាមរបួសរបស់គេដោយលាក់ក្នុងអាវ ប៉ុន្តែពេលថ្មីៗនេះកុន និងកម្មវិធីទូរទស្សន៍ (TV) បានធ្វើឱ្យមានការចាប់អារម្មណ៍ច្រើនឡើងដែលបណ្តាលឱ្យមានការអារ.សាច់,ឆូតឡាមពីសំណាក់ក្មេងមានអាយុ៩ឆ្នាំទៅ១៤ឆ្នាំចង់សាកល្បងតាមកាន់តែច្រើនឡើង ។ អ្នកអាចទៅសាលារៀន អ្នកអាចសាកសួរក្មេង "តើគេមានស្គាល់មិត្តភ័ក្តិដែលអារ.សាច់ខ្លួនឯងទេ?" "ក្មេងភាគច្រើនស្គាល់មិត្តដែលអារ.សាច់ខ្លួនឯង" ។

តាមធម្មតាក្មេងចាប់ផ្តើមចេះធ្វើទារុណកម្មរាងកាយខ្លួនពីអាយុ១៤ឆ្នាំឡើង ។ ប៉ុន្តែពេលថ្មីៗនេះយើងបានឃើញក្មេងអាយុ១១ឆ្នាំឬ១២ឆ្នាំចាប់ផ្តើមដឹងពីរឿងនេះហើយចង់សាកល្បងមើល ។ មនុស្សខ្លះបានធ្វើរឿងនេះរៀងរាល់ពេលមានបញ្ហា ហើយមិនដឹងថា ចង់ផ្តាច់អំពើនេះយ៉ាងណាបានទេ ។ ការអារ.សាច់ខ្លួនភាគច្រើន គឺកើតឡើងជាមួយក្មេងស្រីច្រើនជាងក្មេងប្រុស ។ ក្មេងប្រុសក៏ប្រព្រឹត្តអំពើអារ.សាច់ខ្លួននេះដែរ ប៉ុន្តែមិនច្រើនដូចក្មេងស្រីទេ ។ ការអារ.សាច់ខ្លួន គឺជាការប្រព្រឹត្តរបស់ទំនៀមទំលាប់របស់(Goth)គោះស៍ ។

ក្មេងដែលកាន់ទំនៀមទំលាប់នេះភាគច្រើនចូលចិត្តស្លៀកពាក់ពណ៌ខ្មៅហើយចូលចិត្តការធ្វើកម្មវិធីបូជាយញ្ញសត្វរស់ ឬសម្លាប់សត្វរស់ ។ល។ ក្មេងដែលចូល ឬកាន់ទំនៀមទំលាប់គោះស៍មិនមានន័យថា ក្មេងមិនសប្បាយចិត្តនោះទេ ។ ក្មេងដែលចូលចិត្ត ឬកាន់ទំនៀមទំលាប់ ឬចលនាគោះស៍ គឺស្វែងរកទីកន្លែង ឬក្រុមដែលគេមាន

តទៅទំព័រទី ២៩

**KhmerPost USA, LLC**
សារពត៌មានខ្មែរផុសសហរដ្ឋអាមេរិក
អាស័យដ្ឋាន 45 Merrimack St. Suite 218A. Lowell, MA 01852
លេខទូរស័ព្ទ Phone: 978 677-7163 | Fax: (978) 677-7092
អ៊ីម៉ែល info@khmerpost.us
អានកាសែតនៅគេហទំព័រ www.khmerpost.us
តាមដានយើងនៅទំព័រហ្វេសប៊ុក Like us at: www.facebook.com/KhmerPostUSA
ផ្សាយពាណិជ្ជកម្ម Advertising
អគ្គនាយកទីផ្សារ និងគ្រប់គ្រង សុបិន្ត ពិន Soben Pin, *Managing Partner*
លេខទូរស័ព្ទ 978 - 656 - 8141 (Mobile) 978 677-7163 (Office) |
អ៊ីម៉ែលsobenpin@khmerpost.us
អ្នកនិពន្ធ Editorials
និពន្ធនាយក ពិន សំខុន Roger Samkhon Pin, *Publisher & Editor-in-Chief*
(978) 942 - 1641 | rogerpin@khmerpost.us
ការីនិពន្ធ Staff Writers: Loeum Im, Sokha Lim
Contributed Writers:
Kim Phien, Kim Sos, Mao Chan Somnom, Mam Yin,
Richard Howe Esq. Sengly Kong, Ph.D. James Ostis
ច្នៃសោភ័ណភាពកាសែត Design Artist
Heng Chhunleng
ជំនួយការរដ្ឋបាល Administrative Assistant
Sokha Lim

KhmerPost USA, LLC is an independent newspaper that aims to facilitate mass communication among the Cambodian communities, their neighboring communities, and families. We aim to address local community, and national news; and give an insight into Cambodian & global news. We also strive to bridge the language and cultural gaps and reduce social isolation by publishing in Khmer & English. It published twice a month in Massachusetts serving Greater Lowell, Lynn, Revere, MA, Providence, RI, CT, NY, NJ, and Philadelphia, PA.

Mail subscription is available within the U.S. & Canada at $60.00 or 70 Euros in Europe per year.

The KhmerPost USA has full authorization from Bernard Krisher, the publisher of the Cambodia Daily to reproduce all the articles that are produced by the Cambodia Daily free of charge effective date: 6/19/2009

តមកពីទំព័រទី ១

## ការវិវត្តថ្មីនៃនយោបាយកម្ពុជា

ក្រុមប៉ូលីសរាប់រយនាក់ស្លៀកឯកសណ្ឋានត្រៀមច្បាំងនឹងជាតិខ្លួនឯងបានធ្វើការវាយបំបែកក្រុមបាតុកររាប់រយនាក់ដូចគ្នាដែលមកទាមទារឱ្យប្រគល់ទីលានប្រជាធិបតេយ្យដឹកនាំដោយលោកស្រី មូរ សុខហួរ ។ រូបភាពនឹងព័ត៌មានធម្មតាដែលយើងបានទទួល គឺកងកម្លាំងប្រដាប់អាវុធបង្ក្រាបបាតុកម្មបានចេញវាយបណ្តេញបាតុករបណ្តាលឱ្យរងរបួសជាង១៥នាក់ បើតាមព័ត៌មានភ្លាមៗនៅហ្វេសប៊ុក...តែរូបភាពដ៏អស្ចារ្យនៅពេលបន្តិចបន្ទាប់មក គឺបាតុករដែលជាប្រជាពលរដ្ឋគ្មានអាវុធគ្មានបញ្ហាការបានវាយតបទៅកងប៉ូលិសក្រុងដោយដោយដៃដោយដំបងដងទុងជាតិដោយដងបដារដោយដំបងឆក់យកបានពីប៉ូលីសបណ្តាលឱ្យខាងប៉ូលីសក្រុងរបួសប្រមាណ២០នាក់ បើតាមប្រភពពត៌មានដដែលប្រជាបាតុករមានការឆ្អែតចិត្តនឹងការរងអំពើហិង្សារបស់ប៉ូលីសមកលើខ្លួនមិនឈប់ឈរ រហូតដល់ទ្រាំលែងបាន ។ ព្រឹត្តិការណ៍ថ្មីនេះនាំឱ្យយើងមើលឃើញទិសដោះថ្មីនៃការវិវត្តន៍នយោបាយជាតិបានដែលយើងសូមចែករំលែកការមើលឃើញថ្មីនេះដូចតទៅ:

**ប្រជាបាតុករកាន់វាសនាជាតិដោយខ្លួនឯង :** តាំងពីពេលបោះឆ្នោតហើយ នាខែកក្កដា ២០១៣ មកប្រជាពលរដ្ឋបានបង្ហាញឆន្ទៈយ៉ាងច្បាស់លាស់ថា

**១**-ងាកមកគាំទ្រការដឹកនាំរបស់គណបក្សសង្គ្រោះជាតិដែលចេះរួមផ្គុំគណបក្សប្រឆាំងដ៏បរិសុទ្ធទាំងពីរបាន

**២**-ចំនួនដ៏ច្រើននៃអ្នកចូលរួមបាតុកម្មចូលរួមបោះឆ្នោតទម្លាក់រដ្ឋាភិបាល ហ៊ុន សែន បានលទ្ធផលជាក់ស្តែងរួចហើយ គណបក្សនេះគ្រប់គ្រងដោយគ្មានការគាំទ្រពីប្រជាពលរដ្ឋទេ គឺជាការលួចអំណាច

**៣**-ចាប់ពីខែមករាមកគណបក្សសង្គ្រោះជាតិបានបន្ថយសកម្មភាពតវ៉ាជាសាធារណមកត្រឹមតែចរចារតុមូល រីឯប្រជាពលរដ្ឋ កម្មករ អ្នកតស៊ូមតិនៅតែបន្តរសកម្មភាពបាតុកម្មដោយខ្លួនឯងថែមទាំងមានការអាក់អន់ចិត្តចំពោះគណបក្សសង្គ្រោះជាតិដែលមិនបានជម្រុញបាតុកម្មដ៏ធំបង្អស់ឱ្យទៅដល់ទីបញ្ចប់

**៤**-ឥឡូវនេះមិនត្រឹមតែសមាជិកគណបក្សទេដែលស្រែកអំពាវនាវឱ្យដោះលែងតំណាងរាស្ត្រគណបក្សសង្គ្រោះជាតិទាំងពលរដ្ឋ ទាំងកម្មករ ទាំងក្រុមតស៊ូដីធ្លីមិនមែនគណបក្សក៏បែរជាអ្នកទាមទារឱ្យដោះលែងជំនួសទៅវិញផងដែរ

**៥**-សហជីពកម្មករសហគមន៍បឹងកក់សហគមន៍បូរីកីឡា សហគមន៍ដីធ្លី ប្រជាពលរដ្ឋ ហ៊ានតដៃយ៉ាងអង់អាចប្រឆាំងកម្លាំងនៃរបបយោធានិយម ហ៊ុន សែន ជាការប្រយុទ្ធយកឈ្នះដោយខ្លួនឯងជាក្រុមដឹកមុខជំនួសគណបក្សសង្គ្រោះបានវិញផង ។

លទ្ធផលនៃការប្រឈមមុខចលនាប្រជាពលរដ្ឋ: ក៏រដ្ឋាភិបាល ហ៊ុន សែន មិនត្រឹមមិនចេះដោះស្រាយតាមក្បួនប្រទេសសេរីទេ គឺប្រើកម្លាំងទ័ពប្រើអាវុធចាប់ខ្លួន ក៏ប៉ុន្តែនៅពេលដែលពលរដ្ឋលែងខ្លាចដំបង-កាំភ្លើង នៅពេលដែលគណបក្សសង្គ្រោះជាតិលែងមានមនុស្សឈរជាអ្នកឃាត់ក្នុងចលនាអហឹង្សាព្រឹត្តិការណ៍សង្គ្រាមស៊ីវិលស្ថិតនៅតែមួយសសៃសក់តែប៉ុណ្ណោះពីសន្តិភាព ។ ប្រវត្តិសាស្ត្រធ្លាប់បានបង្ហាញថា ស្ថានភាពបែបនេះនឹងនាំឱ្យទៅដល់ការបង្ហូរឈាមដែលនឹងមានរបបមួយរលំ ពីព្រោះតែបាត់សម្ព័ន្ធមិត្តអស់មិនដឹងទៅណា ពីព្រោះមានតែលុយនឹងកាំភ្លើងច្រើនពេកមិនបានគិតជាខ្មែរនៅចំពោះមុខប្រជារាស្ត្រខ្មែរដ៏ធំធេងដែលបានផ្តេជ្ញាចិត្តយ៉ាងមុតមាំថា ត្រូវតែប្តូររបបចាស់ចោលចេញ ។ ពលរដ្ឋខ្មែរច្រើនលើសលុបកំពុងបង្កើតមេដឹកនាំដោយខ្លួនឯងម្តងបន្តិចៗទៅហើយ រីឯមេដឹកនាំគណបក្សសង្គ្រោះជាតិមានតែឈរមើលការវិវត្តន៍ថ្មីនេះដោយញញឹមនឹងជូនពរ ។

**រដ្ឋាភិបាលខុសច្បាប់ថ្ងៃនេះអាងលើអ្វីទៀត?**

**១**-គឺនៅមានកម្លាំងទ័ពរបស់លោក ទា បាញ់ ដែលគ្រប់គ្រងទ័ព៣០ឆ្នាំមកហើយដែរ អាចនឹងខ្លាំងក្លានៅពេលច្បាំងនឹងពលរដ្ឋឯងតែខ្វះមុខខ្វះក្រោយនៅពេលច្បាំងនឹងបរទេសថែមពីលើនេះទៀតមានចំនួនទ័ពពាក់កណ្តាលដែលទៅពីចលនាតស៊ូនឹងពីចលនាខ្មែរក្រហមដែលនឹងគ្មានបុព្វហេតុសម្រាប់ច្បាំងនឹងគ្នាឯងបានឡើយពេលនោះ ទើបដឹងថា មុខជំនាញដែលរកមនុស្សមកជំនួស ទា បាញ់ មិនបាន គឺជាមិត្តភក្រ្តនិយមចែកនំគ្នាស៊ីសោះ ។

**២**-នៅមានសំអាងលើកម្លាំងប៉ូលីសក្រសួងមហាផ្ទៃ? មានលេចមុខតែប៉ូលីសខណ្ឌ ប៉ូលីសក្រុងភ្នំពេញ ដែល ហ៊ុន សែន ជាអ្នកតែងតាំងតែប៉ុណ្ណោះ តែអ្នកទាំងនោះក៏រស់នៅដោយប្រាក់ខែរហេមរហាម ដូចតែអ្នករាជការឯទៀតៗដែរ បើកុំតែរាស្ត្រចិញ្ចឹមដោយពុករលួយ...ដូច្នេះមិនអាចរាប់ថា ជាអ្នកប្តូរផ្តាច់ស្លាប់រស់ជាមួយនឹង ហ៊ុន សែន បានទេ ។

៣-ហ៊ុន សែន មានសំអាងលើគណបក្សប្រជាជន? គណបក្សនេះធ្លាប់បានបង្ហាញការបែកបាក់គ្នាផ្ទៃក្នុងយ៉ាងជ្រាលជ្រៅតែផ្ទៃក្រៅមិនឱ្យគេឃើញរូបភាពអាក្រក់នោះទេ ។ នាពេលនេះទៀត គណកម្មការកណ្តាលបក្សមើលឃើញថាអ្នកគ្រប់គ្រងខ្លួនចាស់ៗអស់ហើយ ហើយអ្នកចូលថ្មីក៏មិនទាន់មានបទពិសោធន៍គ្រប់គ្រាន់នៅឡើយដែរ ហើយពិសេសទៅទៀតនោះ មិនអាចប្តូរនាយករដ្ឋមន្ត្រី ហ៊ុន សែន បានទេ បើ ហ៊ុន សែន មិនចង់ នេះដោយសារតែមុខមាត់ផ្ទៃក្រៅនោះហើយ ។

**៤-សំអាងទៅលើការភូតភរបោកបញ្ឆោត?** នេះជាជំនាញមួយទៀតរបស់ដុកទ័រ ហ៊ុន សែន គឺភូតភរ... រដ្ឋាភិបាលជាប់គាំងស្ទេញតែខំលាក់បាំងបន្លំភ្នែកថា នៅគ្រាន់បើនៅឡើយ ចាប់មន្ត្រីមានអភ័យឯកសិទ្ធ គឺបើកផ្លូវឱ្យភាពរំជើបរំជួលដ៏ខ្លាំងថ្មីមួយទៀត ដែលខ្លួនបង្ក្រាបបានកាលពីខែមករានោះ កើតឡើងវិញបាន ។ ចង់ដោះបញ្ហារដ្ឋាភិបាលជាប់គាំងដោយយកការដោះលែងតំណាងរាស្ត្រជាថ្នូរការភូទភរដែលគេជាន់កែងទាន់វាក្លាយទៅជាការភ្លាត់ស្នៀតទៅដល់ថ្ងៃអន្សារបស់ខ្លួនបាន ។

បើគណបក្សប្រជាជនទន់យ៉ាងនេះហើយ ហេតុអ្វីក៏គណបក្សសង្គ្រោះជាតិមិនជម្រុញយកអំណាចតែម្តងទៅ? មេបក្សប្រឆាំងបានមកដល់ដំណាក់ការណ៍មានប្រជាប្រិយភាពខ្លាំងណាស់តែទំនងជាគណបក្សសង្គ្រោះជាតិអាចទុកឱ្យគណបក្សប្រជាជនរលួយ ហើយរលំខ្លួនឯងតាមគម្រូនៃប្រទេសសេរី ប៉ុន្តែនេះជាការភាន់ច្រឡំធំមួយ គណបក្សប្រជាជនមានឫសគល់កុម្មុយនីស្តដែលកាន់តែរលួយណាស់កាន់តែរឹងមាំណាស់ទៅវិញដោយក្បួនម៉ាកសីសឡេនីនីស្តជារបបផ្តាច់ការយោធានិយមគេពង្រឹងអង្គភាពរដ្ឋឱ្យឯកជនអាចពុករលួយបានតែប៉ុណ្ណោះ យ៉ាងណាមិញទាំងហ៊ុន សែន ទាំងមន្ត្រីជាន់ខ្ពស់ជំនាញរបស់គាត់សុទ្ធតែកាន់កាប់ក្រសួងសំខាន់ៗ៣០ឆ្នាំ តែរៀងៗខ្លួនដែលសុទ្ធតែពុករលួយទាំងអស់វានឹងការពារគ្នាខ្លាំងណាស់ បើគ្មានថ្នាំខ្លាំងទេនោះ មិនអាចព្យាបាលបានទេ ហើយការព្យាបាលដោយថ្នាំខ្លាំងនៃប្រជាពលរដ្ឋ នាឱកាសមកដល់មិនមែនជាអំពើហឹង្សាទាំងអស់នោះទេ ។ ប្រឈមមុខ នឹងទ័ព ហ៊ុន សែន រាប់ពាន់នាក់ ដែលគ្មានឆន្ទៈគណបក្សសង្គ្រោះជាតិមិនមែនដៃទទេនោះឡើយ ។ កម្លាំងពលរដ្ឋលេចធ្លោកាលពីខែបោះឆ្នោតកក្កដាឆ្នាំ២០១៣ នឹងកាលពីបាតុកម្មអហឹង្សាខែធ្នូឆ្នាំ២០១៣ គឺជាវន្នះស្នេហាជាតិជួបគ្នារាប់លានវិលត៍ ពុំអាចឱ្យទ័ពប៉ុន្មានពាន់នាក់របស់ ហ៊ុន សែន ទា បាញ់ ទប់បានឡើយ ។ ក៏ប៉ុន្តែគេអាចថា ការខ្វះខាតព័ត៌មានលំអិត ការខ្វះខាតរចនាសម្ព័ន្ធជំនាញត្រៀមការខ្វះខាតស្មារតីព្យាយាមប្តូររន្ធើនរហូតដល់បានសម្រេចការខ្វះខាតគម្រោងសម្រាប់ទម្លាក់សត្រូវនាឱកាសមកដល់ណាមួយ គឺគណបក្សសង្គ្រោះជាតិមិនបានត្រៀមខ្លួនរួចជាស្រេចនៅឡើយទេ ឬក៏គ្មានបំណងយកអំណាចពេលនេះនៅឡើយទេផង ។

**វិភាគទៅលើព្រឹត្តិការណ៍ចុងក្រោយបង្អស់:** នាសប្តាហ៍នេះ ទម្លាប់អាក្រក់របស់ ហ៊ុន សែន បានធ្វើឱ្យគាត់ភ្លាត់ម្តងទៀតហើយ ដោយសារតែការចាប់ខ្លួនមន្ត្រីផ្លូវការណ៍របស់គណបក្សសង្គ្រោះជាតិច្រើនរូប ។ ឱកាសបញ្ចេញបាតុកម្មដ៏ធំបង្អស់ឡើងវិញ របស់គណបក្សសង្គ្រោះជាតិបានបង្ហាញខ្លួនជាមួយនឹងវត្តមានរបស់ សម រង្ស៊ី នៅលើទឹកដីកម្ពុជា ។ សម រង្ស៊ី នឹងប្រើគ្រប់មធ្យោបាយដើម្បីរំដោះមិត្តភក្រ្តនយោបាយមកវិញ ។ មធ្យោបាយនោះមាន **១**-ការរំដោះសមាជិកសភាសង្គ្រោះជាតិមកវិញ ដោយបាតុកម្មបន្តររហូតដល់ ហ៊ុន

**តទៅទំព័រទី ២៧**

# CLASSIFIED ADS



រឿងរាមកេរ្តិ៍ ដោយសាគុ សាមុត តម្លៃ $10



របាំបុរាណខ្មែរ ដោយសាគុ សាមុត តម្លៃ $10



រឿងរាមកេរ្តិ៍ ដោយសាគុ សាមុត តម្លៃ $10



ក្រុងភ្នំពេញមុនឆ្នាំ១៩៥៤ តម្លៃ $10



CAMBODGE តម្លៃ $5



អង្គការជានរណា? បីភាគ តម្លៃ $5/1

| | |
|---|---|
| Name | Phone # |
| Shipping Address | Email |
| City, State, Zip | Book Title(s) |

**BOOK ORDER FORM**

Checks or Money Order Payable to KhmerPost USA, LLC

អាចទិញនៅអាស័យដ្ឋានៈ 45 Merrimack St., Suite 218A, Lowell, MA 01852

# និស្សិតខ្មែរអាមេរិកាំងទទួលពានរង្វាន់សិក្សាប្រចាំឆ្នាំ

**ដោយ : ខ្មែរផុសសហរដ្ឋអាមេរិក**

**ម៉ាសាឈូសេតៈ** និស្សិតថូម៉ាស ស (Thomas Sar) បានទទួលពានរង្វាន់កិត្តិយសខ្ពង់ខ្ពស់មួយពីមហាវិទ្យាល័យនៅក្រោគុន ម៉ាសាឈូសេត ពី"ឡូរ៉ង់អាកាដេមី"។ រង្វាន់នោះមានឈ្មោះថា "រង្វាន់មហាវិទ្យាល័យ" សម្រាប់ចែកជូនដល់និស្សិតដែលបានបំពេញចរិយាសម្បត្តិជាសិស្សគម្រូនៅក្នុងសាលាដែលមាតាបិតាទាំងឡាយចង់ឃើញកូនរបស់ខ្លួនចូលរៀនសាលានោះ។

ថូម៉ាស ស ដែលបានទៅរៀនសាលានៅក្រោគុន ជាកូនប្រុសរបស់ អ្នកស្រី ស៊ីវ ខេង និងលោក ផែល ស អ្នករស់នៅឡូវែលជាសិស្សមានចរិតល្អ ប្រកបដោយកិត្តិយសរៀនពូកែ ហើយចូលរួមជាក្រុមកីឡាបាត់ទាត់យ៉ាងទៀងទាត់ រហូតដល់បានឡើងជា "កាប់តែន" នាឆ្នាំទី ៣ ហើយដឹកនាំការប្រកួតមិនចេះចាញ់ រហូតដល់បានពានរង្វាន់ដែលសាលាមិនដែលទទួលតាំងពីឆ្នាំ ១៩៨៨មក។ ពានរង្វាន់ពីមហាវិទ្យាល័យបានបើកទ្វារឱ្យថូម៉ាស់ទទួលបានអាហារូបករណ៍សម្រាប់ទៅរៀនឆ្នាំក្រោយនៅមហាវិទ្យាល័យដ៏ល្បីឈ្មោះលំដាប់ថ្នាក់ទី៣២ គឺមហាវិទ្យាល័យខេនិញ្ញន (Kenyon College) នៅអូហៃយ៉ូ។




ថូម៉ាស កំពុងស្ថិតនៅផ្លូវជោគជ័យក្នុងជីវិតដែលខ្មែរអាមេរិកាំងជាច្រើនស្រម៉ៃចង់បាន។

សូមឱ្យអនាគត "ស្ហមព្យាន" (Shampion) មានសំណាងល្អ !

ពីខាងកាសែតឡូសាន់បានចុះផ្សាយយ៉ាងដូច្នេះថា : ពានរង្វាន់ប្រចាំឆ្នាំបានទៅនិស្សិតពីររូប :

**Lowell SUN :**

"Thomas Sar of Lowell graduated and received with the Faculty Award, given by vote of the faculty to the member of the school community whose conduct and character have contributed much to making LA the type of school to which a parent would wish to send a child.

Also, Shelbie McCormack, who completed her junior year, was inducted into the school's chapter of the Cum Laude Society. With academic achievement as its main criterion, the national Cum Laude Society requires that its members have also demonstrated good character, honor, and integrity in all aspects of their school life. Shelbie is the daughter of Sherri and Robert McCormack."



ថូម៉ាស ស

Continued to Page 02

## MIDSUMMER DREAMS...

Merrimack Valley Restaurant Showcase. "It's going to be an extraordinary event for the entire family," said Deb Belanger, who is Merrimack Valley Convention and Visitors Bureau's Executive Director, and a presenting sponsor for the Festival. "Festival-goers will have a magical experience in Lowell, and our best restaurants have an incredible opportunity to display their signature dishes from our annual Merrimack Valley Restaurant Showcase."

One27 Global is inviting Lowell based nonprofit organizations to participate and present their cause to the community. "I am excited at this innovative opportunity for Non Profits to share the work that we do at this amazing new festival created by One27 Global." says Suzanne Frechette, President of the Nonprofit Alliance of Lowell.

The entire line-up of events for the 2014 Festival can be found at tlfwf.org. General Tickets will be on sale on June 23, 2014. Tickets can be purchased online at tlfwf.org or by calling 978.364.1132 (phone sales open 9AM – 5PM EST).

Continued from page 09

## Lowell Week in Review: July 27, 2014...

India, Iraq, Italy, Jamaica, Jordan, Kenya, Cambodia, Laos, Liberia, Burma, Mexico, Nigeria, Nepal, Sierra Leone, Togo, Thailand, Uganda, Vietnam, and Zimbabwe. A full 18% of the graduating seniors in the class of 2014 were born in countries other than the United States.

While there is legitimate concern about the financial impact on the schools by a number of refugee families who are already bound for Lowell from the Congo I suspect that the media-generated hysteria about unaccompanied minors from Central America coming across the US-Mexican border seems to be a part of it. Councilor Belanger certainly alluded to that in his remarks on Tuesday night

He was also emphatic that the cost of educating refugee students "should not be on the backs of the Lowell taxpayers" which is a little bit misleading. Since the state legislature passed ed reform back in 1993, 90% of the cost of the Lowell public schools is paid by the Commonwealth of Massachusetts. The contribution from city tax funds is less than it was back then and is an amount mandated by state law. Since ed reform, councils have struggled to even meet that minimum funding. There was a large outlay in this year's city budget for the schools, but that was simply making up for past shortfalls in violation of state law. To suggest that this council will spend one penny more than is absolutely mandated by state law on the public schools is deceptive because it will not. Sure the taxpayers of Lowell are also taxpayers of Massachusetts, but financing the cost of Lowell's public schools is a burden spread across the state and not "on the backs of Lowell taxpayers."

Again, while I'm all for lobbying for more money from the state and Feds for the Lowell public schools, public figures, both elected and otherwise, should employ such rhetoric with caution because listeners don't always catch nuance in public statements. This was illustrated to me about ten years ago when a daily occurrence on morning talk radio was rants about "illegals." Later on a day I had appeared as a guest on the radio, I was at a local retail establishment when the clerk, a women who I vaguely recognized from church, said

I heard you on the radio this morning. I just love listening to [the host]. He's right that we have to do something about these illegals. Just the other day I was in line at the grocery store and everyone in front of me spoke Spanish. It was terrible.

That kind of ugliness is not new to Lowell. I have a deed for property on Fairmount Street from 1881 that includes as a condition of sale that "the said premises are being deeded under the express condition that the land shall never be deed or conveyed to any person born in Ireland."

As I get ready to leave for today's offerings at the Lowell Folk Festival, I'm reminded that every group that has come to the city since its founding has been looked upon with disdain by some who came before, but with the help of more empathetic residents, the newcomers remained, persevered, and made the city a better place. As we lobby for additional funding for the cost of educating incoming refugees, we should always remember that.

# ខ្មែរអ្នកជាតិនិយម

តពីលេខមុន

បារាំង-ខ្មែរមួយដែលនៅក្នុងនោះឥតមានអ្វីថ្មីដែលនាំឱ្យខ្មែរពេញចិត្តទេ ផ្ទុយទៅវិញ វាកាន់តែបង្កើតការខ្វែងគំនិតគ្នាខ្លាំងឡើងទៀតលើបញ្ហាសេដ្ឋកិច្ច និងហិរញ្ញវត្ថុដែលកម្ពុជាចាញ់ប្រៀបបារាំងទាំងស្រុង ។

ដោយឃើញច្បាស់ថា បារាំងពុំព្រមប្រគល់ឯករាជ្យឱ្យខ្មែរតាមវិធីចរចានោះ ព្រះបាទសីហនុក៏មានគំនិតដូចលោក សឺន ង៉ុកថាន់ ដែរ គឺត្រូវទាមទារយកឯករាជ្យពីបារាំងដោយវិធីប្រើកម្លាំងអាវុធ ប៉ុន្តែខុសគ្នាត្រង់ទ្រង់មិនព្រមចូលព្រៃព្រោះទ្រង់ចង់បង្កើតរដ្ឋាភិបាលក្រៅប្រទេសមួយនៅប្រទេសសៀមជាដំបូងសិន រួចសឹមតស៊ូដោយកម្លាំងអាវុធ ។ ដំណឹងនេះ បានឮទៅដល់លោក សឺន ង៉ុកថាន់ ហើយមួយរំពេចនោះ លោក សឺន ង៉ុកថាន់ ក៏ផ្ញើលិខិតមួយទៅថ្វាយព្រះករុណាសីហនុ តាមរយៈព្រះរាជបិតា និងព្រះរាជមាតាព្រះអង្គសុំអង្វរព្រះទ័យកុំឱ្យព្រះអង្គយាងទៅបាងកក សូមយាងចូលព្រៃពួតដៃគ្នាជាមួយចលនាឥស្សរៈរួមខ្មែរបំរើជាតិ នៅលើភ្នំដងរែកបានហើយ ពីព្រោះស្ថានការណ៍ពិភពលោក និងស្ថានការណ៍ភូមិភាគ ជាពិសេសនៅឥណ្ឌូចិនច្បាស់ជាបង្ខំឱ្យមហាអំណាចប្រជុំគ្នាដោះស្រាយបញ្ហាទាំងនោះជាពុំខាន ហើយប្រទេសយើងមុខជាត្រូវបានទទួលឯករាជ្យពេញទី ដោយសន្និសីទអន្តរជាតិទទួលធានារ៉ាប់រងផងក្នុងពេលដ៏ខ្លីខាងមុខនេះ ។ មិនត្រឹមតែផ្ញើលិខិតទៅថ្វាយយោបល់ប៉ុណ្ណោះទេ លោក សឺន ង៉ុកថាន់ ថែម


និពន្ធដោយ ឡឹក សំអឿន ហៅ "ផ្កាយព្រឹក"

ទាំងបានផ្ញើលិខិតចំហជាច្រើនច្បាប់ទៅទីប្រឹក្សាជាន់ខ្ពស់របស់ព្រះករុណា មានសម្តេច ប៉ែន នុត សម្តេច សឺន សាន ព្រមទាំងសម្តេចព្រះសង្ឃរាជទាំងពីរគណៈទៀតផង សូមឱ្យជួយឃាត់កុំឱ្យព្រះករុណាយាងទៅពឹងសៀមឱ្យសោះ ក្រែងនាំឱ្យខូចឈ្មោះនៅក្នុងពង្សាវតាដូចដែលធ្លាប់មានមកហើយ ។

ថ្ងៃទី ១២ មិថុនា ១៩៥៣ បន្ទាប់ពីបានផ្ទេរតំណែងនាយករដ្ឋមន្ត្រីជាលើកទី២ ទៅឱ្យលោក ប៉ែន នុត ព្រះករុណាសីហនុ ពុំព្រមស្តាប់យោបល់អ្នកណាម្នាក់ទេ ទ្រង់ក៏យាងទៅក្រុងបាងកកប្រទេសសៀម ។ ថ្ងៃទី ១៦ មិថុនា ទ្រង់ព្រមទាំងបរិពារចំនួន២១រូប បានទៅដល់ក្រុងបាងកកមែនដែលនៅទីនោះមានមេនគរបាលសៀម ឧត្តមសេនីយ៍ ផៅ សិរិយានន្ទ ជាអ្នកទទួលព្រះអង្គ ។ ឯនៅទីក្រុងភ្នំពេញវិញ វិទ្យុជាតិបានផ្សាយនូវរាជសាររបស់ព្រះអង្គដែលផ្ញើទៅរដ្ឋាភិបាលបារាំង មានសេចក្តីដូចតទៅ :

ដោយចង់ចៀសវាងចម្បាំងតទល់នឹងបារាំងជាចម្បាំងមួយដែលបណ្តាជនខ្មែរកាន់តែមានចំនួនច្រើនលើសលប់ចង់ធ្វើនោះ ខ្ញុំចាកចេញពីខ្មែរ ដោយមិនចាំបាច់ឱ្យមានគ្រោះថ្នាក់ជាស្ថាពរដល់ទំនាក់ទំនងជាភាតរភាពជាមួយប្រទេសបារាំងឡើយ ដោយប្រទេសបារាំងបានធ្វើឱ្យគេឃើញនូវអាកប្បកិរិយារារែករបស់ខ្លួនថា ទោះជាក្នុងបច្ចុប្បន្នកាលនេះក្តីតែមួយដែលអាចធ្វើជាដើមទីនៃសហប្រតិបត្តិការសឹកដ៏ស្មោះ ហើយមានផលប្រយោជន៍ដល់ប្រទេសយើងទាំងពីរ និងដើម្បីកសាងការរួបរួមរបស់យើងនៅក្នុងសហភាពបារាំង" ។

នៅក្រុងបាងកក រដ្ឋាភិបាលសៀមបានចាត់ទុកនរោត្តម សីហនុ ព្រមទាំងរាជបរិវារថាជាជនភៀសនយោបាយ ។ អាជ្ញាធរសៀមហាមឃាត់មិនឱ្យធ្វើសកម្មភាពនយោបាយអ្វីទាំងអស់ ។ ហេតុនេះព្រះចៅសីហនុព្រមទាំងរាជបរិវារត្រូវតែបង្ខំចិត្តវិលត្រឡប់ចូលស្រុកវិញ សំណាក់នៅទីក្រុងបាត់ដំបងយ៉ាងអាម៉ាស់មុខ ។ ក្នុងពេលនោះ នៅទីក្រុងភ្នំពេញសភាពតានតឹងរវាងបារាំងនិងខ្មែរ ក៏បានកើតមានឡើង ។ ឧត្តមសេនីយ៍បារាំង ដឺឡង់ក្លាដ ជាមេបញ្ជាការកងទ័ពជើងគោកបារាំង បានហៅកងកម្លាំងពីប្រទេសយួនឱ្យមកជួយការពារជនជាតិបារាំង បានហៅកងកម្លាំងពីប្រទេសយួនឱ្យមកជួយការពារជនជាតិបារាំងប្រមាណ៦០០នាក់នៅប្រទេសខ្មែរ ។ ពីទីក្រុងបាត់ដំបង ព្រះករុណាសីហនុបានប្រាប់ទៅរដ្ឋាភិបាលបារាំងថា រដ្ឋាភិបាលខ្មែរបានទាត់ចោលនូវកិច្ចព្រមព្រៀងចុះថ្ងៃទី ៦ ឧសភា ១៩៥៣ ហើយ ហើយសុំធ្វើកិច្ចចរចាថ្មីមួយដែលនៅក្នុងនោះខ្មែរទាមទារលក្ខន្តិកៈមួយដូច Dominion នៃប្រទេសប៉ាគីស្ថានដែលប្រទេសអង់គ្លេសបានប្រគល់ឱ្យ ។

ថ្ងៃទី ២ កក្កដា ១៩៥៣ ព្រះករុណាសីហនុបានអំពាវនាវតាមរាជសារមួយទៅកាន់ប្រជាជាតិខ្មែរឱ្យក្រោកឈរឡើងរួមគ្នាតស៊ូយកឯករាជ្យជាតិ ។ មិនយូរប៉ុន្មាន ប្រជាពលរដ្ឋខ្មែរទាំងបុរសទាំងនារីចំនួន២ម៉ឺននាក់ បានស្ម័គ្រចិត្តចូលបំរើកងកម្លាំងដែលទើបបង្កើតថ្មី ហៅថា "**កងជីវពល**" និង **កងនារីក្លាហាន** តាំងជំរុំនៅទីរួមខេត្តបាត់ដំបង និងសៀមរាប ។ លុះស្អែកឡើង ថ្ងៃទី៣ កក្កដា ១៩៥៣ រដ្ឋាភិបាលបារាំងរបស់ ឡានីញ៉ែល ក៏បានបើកប្រជុំគណៈរដ្ឋមន្ត្រី ព្រោះយល់ថា បើឱ្យឯករាជ្យទៅកម្ពុជាពេលនេះជាទ្វេភាគីជាមួយសីហនុ វាប្រសើរជាងទុកឱ្យសន្និសីទអន្តរជាតិសម្រេចចិត្ត ដែលអាចពុំមែនបានទៅលើដៃសីហនុ វាបែរជាបានទៅលើចលនាតស៊ូខ្មែរវៀតមិញ ឬក៏ទៅលើចលនាឥស្សរៈរួមខ្មែរបំរើជាតិដែលជាចលនាអ្នកជាតិនិយមដឹកនាំដោយ សឺន ង៉ុកថាន់ ។ ទីប្រជុំគណៈរដ្ឋមន្ត្រីបារាំង ក៏បានធ្វើកំណត់ហេតុមួយផ្ញើទៅអគ្គស្នងការប្រចាំសមាគមរដ្ឋទាំង៣ ដែលក្នុងនោះនិយាយថា រដ្ឋាភិបាលបារាំងស្នើថា នឹងឱ្យឯករាជ្យក្រោយកិច្ចចរចាថ្មីមួយទៀត ។ ដើម្បីបង្ហាញនូវសុឆន្ទៈរបស់ខ្លួនរដ្ឋាភិបាលបារាំងក៏បានដាក់អ្នកការទូតម្នាក់ឈ្មោះ ម៉ូរិស ដឺស្សង់ ជាអគ្គស្នងការនៃឥណ្ឌូចិន ។ នៅកម្ពុជាកិច្ចចរចាបារាំង-ខ្មែរក៏បានធ្វើឡើងនៅភ្នំពេញ រវាងនាយករដ្ឋមន្ត្រី ប៉ែន នុត និង ម៉ូរិស ដឺស្សង់ ។ កិច្ចចរចានេះ បានចេញទៅជាកិច្ចព្រមព្រៀងជាលើកដំបូង នៅថ្ងៃទី ២៩ សីហា ១៩៥៣

តទៅលេខក្រោយ

Continued from page 12

## Hun Sen, Rainsy Strike Deal; CNRP to Take Seats...

CNRP's participation.

Mr. Rainsy, who was banned from running in the last election and is not a lawmaker-elect, said he is seeking a meeting with King Norodom Sihamoni this week to request that his lawmakers be sworn in.

"There is a schedule. It's not very precise, but I think I can say that later this week, we would go to meet with the Queen and the King," he said. "The King may grant us an audience this week. After that week, one, two or three days later, we will go to swear in at the Royal Palace."

Mr. Sokha of the CPP said he believed that the CNRP's 55 lawmakers-elect would be sworn in at a special ceremony on Friday.

Under the new agreement, the CNRP will hold the chairmanships of five committees in the National Assembly, including a new anti-corruption committee, while the CPP will hold the five others.

The CPP will retain the position of National Assembly president and the second deputy president, but the CNRP will appoint the first deputy president. Eng Chhay Eang, who will swear in as an opposition lawmaker for Kandal province, said CNRP Vice President Kem Sokha will be selected by the party to become National Assembly first vice president.

"In the hierarchy of the party, His Excellency [Mr. Rainsy] is the prime ministerial candidate and Kem Sokha is the candidate for the presidency of the National Assembly," he said. "Therefore, when there is the position in the National Assembly, Kem Sokha has to get it."

According to the arrangement, the CPP will hold on to a slim majority of the National Assembly standing committee, which sets the legislative body's agenda and comprises the National Assembly president, two deputy presidents and the 10 committee chairs.

The permanent committee in the lead-up to the last election expelled all the lawmakers from the Sam Rainsy Party and Human Rights Party from parliament after the parties merged into the CNRP, citing internal rules banning lawmakers from being members of two parties at once.

The united opposition then surprised the long-ruling CPP in the disputed July 2013 election, whose anniversary falls on Monday, picking up 55 seats and launching months of anti-government demonstrations in Phnom Penh calling for an election investigation or a fresh election.

Under the agreement struck Tuesday, however, the election will not be moved up significantly, which marks a major concession from the CNRP. The party had been demanding since December that the next election be held much earlier than July 2018, when it is presently scheduled.

At a press conference after the negotiations ended, Mr. Sokha of the CPP said that the date would be changed slightly.

"The two parties agree to reset the date for the election in the future, but not for a vote before the end of the mandate," Mr. Sokha said.

The CPP has since September said that it wishes to move the election only to February 2018, and Mr. Rainsy had indicated on his Facebook page late on Sunday night that the CNRP accepted the date.

Mr. Sovann, the CNRP spokesman, said the opposition was pleased with the concessions it had drawn from the CPP.

"We believe that from now on there will be checks and balances on power, with the ruling party and the other parties… with seats in the National Assembly making decisions and working together."

Continued from page 13

## As Prices Fall, Rat Hunting's...

previous evening's fly-covered catch.

The father of three, who used to earn just 10,000 riel, (about $2.50), a day as a junk collector before becoming a rat hunter three years ago, said grinding poverty had driven him into this line of work.

"We really want to change our job since it is dangerous, but we do not have a choice…. We have to find money to support our families," he said.

For all of the men at the Stung Meanchey waste site who have made rat catching their livelihood, their decision comes down to simple economics. Mr. Han said he could earn as much as $32.50 per day when he first started catching, at the height of the rat market.

However, the price they can fetch for their catch is now starting to fall.

Sok Kom, 29, previously made about $60 per month working for an oil distribution firm but now receives 3,500 riel ($0.87) per kg of rats.

He says increasing competition has driven down his nightly haul from about 15 kg to 10 kg or less, making his livelihood less sustainable than it once was.

And as more people have flocked to the vocation, the sole buyer has also slashed the price for a kilogram of rodents from 6,500 riel ($1.62) to 3,500 riel. A night's work might now net Mr. Kom only $8.75, down from about $24.

"If the buyer keeps decreasing the price and we can't catch as many rats, we [my wife and I] might become junk collectors," he said.

Rat catchers say they must contend with vicious dogs, police who suspect them of carrying out crimes because of their spears and actual lawbreakers who believe them to be police interrupting their criminal activities.

"When I go hunting at night I am afraid of the gangsters since they think we are coming to interrupt them [because of our torches]…. They sometimes chase me and try to hit me," Mr. Kom said.

Fellow rat catcher Chea Oun, 31, said he regularly had to clamber into the city's drainage system to pin down his prey.

"It is hard for us to catch the rats since they often stay inside the drains so we have to crawl in after them," he said. "The smell in the drains is really bad, but we have become used to it."

Despite the unpleasant nature of their work, Mr. Oun said he and his fellow rat catchers had little choice but to keep hunting, even with the descending price of their catch.

"We cannot complain since we have only one buyer, therefore we have no choice and we can only sell to him…. He is the one who sets the price for us," he said.

The purchaser of the rats is a comparatively well-off businessman who lives in a two-story concrete house at the dump.

He refused to talk to a reporter before driving away on a motorbike, but his wife, Pov Chantho, 55, said the couple bought about 100 kg of rats per day.

Speaking as a steady stream of people brought their catch to be weighed outside her family's home, Ms. Chantho said the rat meat, which is stored in large plastic coolers, was being sold to Thai buyers.

"We keep it for about five days and when we get about 500 kg with 10 pieces of ice and send it to Thailand," she said.

Continued from page 13

## No End in Sight for Chronic...

Mr. Dimanche said no cleaning had taken place as of yet but preparations were underway to start.

Carelessly discarded trash has also meant that the ongoing construction of a $350-million drainage system by the Japan International Cooperation Agency in parts of the city has not eased flooding, either.

Duong Chansarath, chief of the drainage and sewage unit at the Phnom Penh department of public works and transport, said he would like to see even more new drains but added that it would depend on whether City Hall had the budget.

"The drainage system in Phnom Penh was built in French colonial times. Mostly drains are still good to use and others we can fix," he said.

But on Norodom Boulevard on Tuesday evening, commuters were focused simply on getting home.

Kuch Veasna, 26, a vendor at O'Russei market, said he would like to see the problem fixed.

"Flooding in Phnom Penh has been a problem for a long time. It makes it really difficult to go somewhere," he said.



# ថ្មរូង រមណីយដ្ឋានធម្មជាតិ



●●●អូរថ្មរូងស្ថិតនៅក្នុងភូមិព្រៃប្រសិទ្ធ ឃុំបាក់រទេះ ស្រុកកំពង់សិលា ខេត្តកោះកុង នៅក្បែរចំណុចប្រសព្វរវាងខេត្តកោះកុង និងខេត្តកំពង់ស្ពឺ ។

បើយើងធ្វើដំណើរចេញពីភ្នំពេញលើកំណាត់ផ្លូវជាតិលេខ៤ ឆ្ពោះទៅទីក្រុងព្រះសីហនុដល់គីឡូម៉ែត្រលេខ១១៨ ដែលហួសពីចំណោតឃាយម៉ៅពេជ្រនិលបានប្រមាណ១២គីឡូម៉ែត្រ រួចក្រឡេកមើលខាងស្តាំដៃយើងនឹងបានឃើញផ្លូវលំក្រាលក្រួសក្រហមមួយហើយបន្តដំណើរលើកំណាត់ផ្លូវនោះ៦ គីឡូម៉ែត្រនឹងបានទៅដល់អូរថ្មរូង ។

នៅអមសងខាងរមណីយដ្ឋានអូរថ្មរូងមានលក្ខណៈពិសេស និងល្អខុសប្លែកពីរមណីយដ្ឋានផ្សេងៗដោយសារតែនៅអមសងខាងអូរមានភ្នំខ្ពស់ទាបៗដែលមានព្រៃ និងវល្លិធ្លាក់សំយាកទៅក្នុងអូរដែលធ្វើឱ្យអ្នកទេសចរដែលចុះទៅងូតទឹកលេងមានសភាពសប្បាយរីករាយជាមួយនឹងធម្មជាតិ។ រឹតតែពិសេសជាងនេះទៅទៀត នៅ





គ្រប់ទឹកខ្លែងនៃបាតអូរមានដុំថ្មតូចធំយ៉ាងច្រើនមានខ្លះងើបផុតពីផ្ទៃទឹកអាចឱ្យភ្ញៀវអង្គុយលេងយ៉ាងសប្បាយរីករាយឯដុំថ្មខ្លះបាននៅបំប្រះទឹកដែលភ្ញៀវអាចឈរនៅលើដុំថ្មប៉ប្រះទឹកនោះ មើលពីចម្ងាយទៅហាក់ដូចជាគេមានសិល្បវេទមន្តអាចដំណើរលើទឹកបាន ។





ក្រៅពីមើលខ្សែទឹកហូររត់គេចវាងជាមួយនឹងផ្ទាំងថ្មដែលងើបផុតពីផ្ទៃទឹកនោះ ភ្ញៀវអាចស្តាប់សំឡេងទឹកធ្លាក់លាន់រំពឹងព្រៃលាយឡំជាមួយនឹងសំឡេងសត្វបក្សីយំយ៉ាងរំពងព្រៃផងនោះ បានបង្កើតជាតន្ត្រីធម្មជាតិមួយយ៉ាងពីរោះដែលយើងពិបាកនឹងរកអ្វីមកប្រៀបប្រដូចឱ្យស័ក្តិសមណាស់ ។

រមណីយដ្ឋានអូរថ្មរូងមានតំបន់កម្សាន្តលំហែកាយខុសៗគ្នាចំនួន៤ ។ តំបន់អូរថ្មរូងស្ថិតនៅដើមដំបូងគេតំបន់នេះមានដងអូរហ៊ុមព័ទ្ធសងខាងទៅដោយភ្នំដែលមានដើមឈើ និងវល្លិវារឃើងរយោងយ៉ាងក្រាស់ ។ នៅក្នុងដងអូរមានដុំថ្មធំៗយ៉ាងច្រើនងើបផុតពីផ្ទៃទឹកតំបន់នេះចម្ងាយប្រវែង១.៥០០ម៉ែត្រនឹងមានចរន្តទឹកហូរមិនសូវខ្លាំងប៉ុន្មានឡើយ ។ តំបន់អូរថ្មរូងទីពីរលាតសន្ធឹងចម្ងាយ១.១០០ម៉ែត្រ ដែលមានទេសភាពមិនចាញ់តំបន់ទីមួយឡើយ ប៉ុន្តែតំបន់នេះមានល្បឿនទឹកហូរលឿនជាងតំបន់ទីមួយ ព្រោះតំបន់នេះ ស្ថិតនៅភាគខាងលើ ។ តំបន់ទីបី គឺជាតំបន់ទឹកធ្លាក់ចំណុចនេះហើយដែលភ្ញៀវទេសចរទាំងឡាយដែលបានទៅដល់ទីនោះហើយត្រូវតែចង់ឃើញនូវទិដ្ឋភាពនៃទឹកធ្លាក់ពីកំពូលភ្នំខ្ពស់មកប៉ះព្រៃព្រឹក្សានិងផ្ទាំងថ្មធំៗបែកខ្ចាយមុននឹងហូរចូលទៅដងអូរ ។ ទិដ្ឋភាព និងទេសភាពនៅទីនេះបានធ្វើឱ្យភ្ញៀវទាំងឡាយសម្លឹងផ្ចិតយករូបភាពដោយមិនអាចប៉ប្រិចភ្នែកឡើយ ។ ភ្ញៀវខ្លះនាំគ្នាទៅងូតទឹកនៅខាងក្រោមនៃល្បាក់ទឹកធ្លាក់យ៉ាងសប្បាយរីករាយ និងតំបន់ទីបួនគឺជាតំបន់ទេសភាពធម្មជាតិដែលស្ថិតនៅអមសងខាងអូរភ្ញៀវទេសចរទាំងឡាយអាចទៅអង្គុយលេងនៅតាមជម្រាលនៃជើងភ្នំ ឬក៏អ្នកខ្លះអាចអង្គុយលេងនៅលើវល្លិដែលដុះតភ្ជាប់គ្នាពីដើមឈើមួយទៅដើមឈើមួយទៀត ។ ទេសភាពបែបនេះគេកម្រនឹងឃើញមានណាស់នៅក្នុងប្រទេសកម្ពុជាយើងសព្វថ្ងៃនេះ ។

ទោះបីទេសភាព និងទិដ្ឋភាពនៃតំបន់ទេសចរណ៍អូរថ្មរូងមានភាពល្អអស្ចារ្យយ៉ាងណាក្តីក៏ទីនោះពុំទាន់សូវមានភ្ញៀវស្គាល់ច្រើនប៉ុន្មានឡើយមានតែភ្ញៀវបរទេសមួយចំនួនតូច និងអ្នកក្នុងស្រុកខ្លះៗប៉ុណ្ណោះដែលបានដឹង និងចូលទៅទស្សនា ។

លោក ពិន សេម មេឃុំអូរបាក់រទេះ ស្រុកកំពង់សិលាខេត្តកោះកុងបានឱ្យដឹងថា តំបន់ទេសចរណ៍ធម្មជាតិអូរបាក់រទេះប្រជាពលរដ្ឋមិនចង់ឱ្យមានឈ្មួញមកធ្វើការអភិវឌ្ឍឡើយ គឺប្រជាពលរដ្ឋចង់រៀបចំអភិវឌ្ឍដោយខ្លួនឯង ។ ការរៀបចំអភិវឌ្ឍដែលគ្រប់គ្រងដោយសហគមន៍ផ្ទាល់នោះវាពិតជាមានផលចំណេញយ៉ាងច្រើនចំពោះសហគមន៍ ។ ទីមួយអាចជួយឱ្យប្រជាពលរដ្ឋនៅក្នុងសហគមន៍មានមុខរបរបន្ថែមដូចជាការដាំដុះដំណាំហូបផ្លែទុកសម្រាប់លក់ជូនភ្ញៀវ ហើយម្យ៉ាងទៀតប្រជាពលរដ្ឋនាំគ្នាជួយការពារនិងថែរក្សាបរិស្ថាន និងព្រៃឈើនៅទីនោះបានយ៉ាងល្អទៀតផង ។ មានប្រជាពលរដ្ឋពីរភូមិនៅក្នុងសហគមន៍ដែលបានទទួលផលប្រយោជន៍ពីតំបន់ទេសចរណ៍អូរថ្មរូងនេរួមភេទ ប្រសិនបើយើងរៀបចំឱ្យវាដំណើរការល្អ ។

ប្រធានអង្គការម្លប់បៃតងបានឱ្យដឹងថា តំបន់ទេសចរថ្មរូងនេះ គឺជាតំបន់ទេសចរណ៍ដែលមានទេសភាពល្អផ្តាច់គេនៅក្នុងប្រទេសកម្ពុជាយើងវាមានលក្ខណៈពិសេស និងទេសភាពកម្ររកបានណាស់ សូម្បីតែទឹកធ្លាក់នៅភូមិភាគឦសានក៏មិនអាចប្រដូចទឹកនេះបានឡើយ ។ ភ្ញៀវទេសចរដែលទៅកម្សាន្តនៅក្នុងព្រះសីហនុគ្រាន់តែចំណាយពេលមួយម៉ោង ឬពីរម៉ោងគេក៏អាចទៅកម្សាន្តបានដែរ ។ លោកជឿថា ទៅថ្ងៃអនាគតដ៏ខ្លីខាងមុខនេះនឹងមានភ្ញៀវទេសចរទៅកម្សាន្តទីនេះកាន់តែច្រើនឡើង ៕

## តមកពីទំព័រទី ១៤ លោក ហ៊ុន សែន និងលោក សម រង្ស៊ី ....

ខ្លួនចង់ផ្លាស់ប្តូរថ្ងៃបោះ ឆ្នោតមកត្រឹមខែ កុម្ភៈ ឆ្នាំ២០១៨ ហើយលោក សម រង្ស៊ី បាន បញ្ជាក់តាមទំព័រហ្វេសប៊ុកកាលពីយប់ថ្ងៃអាទិត្យ ថា គណបក្សសង្គ្រោះជាតិទទួលយកកាលបរិច្ឆេទ នេះ ។

លោក យឹម សុវណ្ណ អ្នកនាំពាក្យគណបក្ស សង្គ្រោះជាតិបានមានប្រសាសន៍ថា គណបក្ស ប្រឆាំងរីករាយចំពោះការធ្វើសម្បទានពីគណបក្ស ប្រជាជនកម្ពុជា ។ លោកបានមានប្រសាសន៍ថា "យើងជឿថា ចាប់ពីពេលនេះទៅនឹងមានតុល្យ ភាពអំណាចហើយ ដោយគណបក្សកាន់អំណាច និងគណបក្សផ្សេងទៀតដែលមានអាសនៈនៅក្នុងរដ្ឋសភាសម្រេចធ្វើការរួមគ្នា" ៕ **គីម ហឿន**

## តមកពីទំព័រទី ១៣ ការជន់លិចរាំរ៉ៃនៅក្រុងភ្នំពេញ...

ក្នុងយុទ្ធនាការនោះសាលាក្រុងក៏បានសន្យា សម្អាតប្រព័ន្ធបង្ហូរទឹកក្នុងក្រុងបីដងនៅរដូវវស្សា ដើម្បីបន្ថយការជន់លិចប្រហែល៧០ភាគរយដែល បង្កឡើងដោយការស្ទះសំរាម ។

លោក ឌី ម៉ង់ បានមានប្រសាសន៍ថា មិន ទាន់មានការស្តារប្រព័ន្ធលូបង្ហូរទឹកនៅឡើយទេ ប៉ុន្តែបានរៀបចំធ្វើហើយ ។

ការចោលសំរាមពាសវាលពាសកាលមានន័យ ថា ឥការស្ថាបនាប្រព័ន្ធលូទឹកសម្ភុយតម្លៃ៣៥០ លានដុល្លាររបស់ទីភ្នាក់ងារសហប្រតិបត្តិការអន្តរ ជាតិជប៉ុនហៅកាត់ថា Jaica មិនអាចសម្រាលការ ជន់លិចក្នុងរាជធានីបានទេ ។

លោក ដួង ច័ន្ទសារ៉ាត ប្រធានអង្គភាព លូទឹក-បូមទឹកនៅមន្ទីរសាធារណការ និងដឹក ជញ្ជូនរាជធានីបានមានប្រសាសន៍ថា លោកចង់ បានប្រព័ន្ធលូទឹកថ្មីទៀត ប៉ុន្តែវាអាស្រ័យលើ ថវិការបស់សាលារាជធានី ។ លោកបានឱ្យដឹងថា? "ប្រព័ន្ធលូបង្ហូរទឹកក្នុងរាជធានីមានតាំងពីសម័យ អាណានិគមបារាំង ។ ភាគច្រើននៅប្រើបាន ហើយ ប្រព័ន្ធផ្សេងទៀតយើងអាចជួសជុលបាន" ។

ប៉ុន្តែនៅតាមមហាវិថីព្រះនរោត្តមកាលពី ល្ងាចម្សិលមិញអ្នកធ្វើដំណើរទាំងឡាយគិតតែជិះ បញ្រ្ចៀតគ្នាដើម្បីឱ្យបានទៅដល់ផ្ទះរបស់ពួកគេ ប៉ុណ្ណោះ ។

គុច វ៉ាសនា អាយុ២៦ឆ្នាំ ជាអាជីវករនៅផ្សារ ទួលទំពូងបាននិយាយថា លោកចង់ឱ្យគេដោះស្រាយ បញ្ហានេះ ។ លោកបានបន្ថែមថា "ការជន់លិចក្នុង រាជធានីភ្នំពេញជាបញ្ហាមួយយូរមកហើយ ។ វាពិតជា លំបាកណាស់ក្នុងការធ្វើដំណើរទៅណាម្តងៗ" ៕ **មាលិត**

## តមកពីទំព័រទី ២១ ការវិវត្តថ្មីនៃនយោបាយកម្ពុជា

សែន ធ្លាក់ពីអំណាចក្នុងតម្លៃណាក៏ដោយ **២-** យល់ព្រមចូលសភាទាំងបង្ខំចិត្ត រហូតដល់បានអភ័យ ឯកសិទ្ធតែតថ្លៃគ្នាក្នុងតម្លៃខ្ពស់បាន គឺដក ហ៊ុន សែន ឬទាមទារអំណាចសំខាន់ខ្លះសម្រាប់ការពារខ្លួនក្នុង អន្តរកាល ឬបោះឆ្នោតសារថ្មីភ្លាមៗ **៣-**ពលរដ្ឋ នឹងបានចំណេញខ្លះក្នុងដំណាក់ការណ៍ដំបូងមិន បានដូចការទាមទារទាំងអស់ទេ តែមានពេល អាចរៀបចំរចនាសម្ព័ន្ធត្រៀមសម្រាប់ពេលឡើង កាន់អំណាចបាន ។

**បង្រួមសេចក្តី:** គណបក្សប្រជាជនអស់ មានការគាំទ្រដោយស្ម័គ្រចិត្តទៀតហើយបរាជ័យ នេះអាចទាយទុកមុនបាន ។ ដូច្នេះគេអាចនឹង ឃើញការការត្រដរខ្យល់ចុងក្រោយដោយប្រើ កម្លាំងលុយកម្លាំងទ័ពនឹងកម្លាំងបោកបញ្ឆោត ដើម្បីអូសបន្លាយអំណាចសាកល្បងរស់ឱ្យបាន យូរបន្តិច ។ គណបក្សសង្គ្រោះជាតិមកដល់ពេល នេះ មានការងាយស្រួលនឹងបើកការចរចារធំៗ ដោយសារតែគណបក្សប្រជាជនដឹងថាអវសាន្ត របស់ខ្លួននឹងដើរតាមគន្លងក្រុមខ្មែរក្រហមខិតខំ តថ្លៃឱ្យអាចស្រង់បានខ្លះតែប៉ុណ្ណោះ ។ ក៏ប៉ុន្តែទំព័រ នយោបាយថ្មីនេះអាចនឹងបង្ហាញនូវការភ្ញាក់ផ្អើល ខុសពីការស្មានដោយសារតែប្រជាពលរដ្ឋនៅ តែដើរតាមផ្លូវដែលខ្លួនទាមទារបែកពីផ្លូវរបស់ គណបក្សសង្គ្រោះជាតិដែលបានជ្រើសរើសការ តស៊ូផ្លូវក្នុងច្បាប់ទៅហើយនោះ ៕

## ព័ត៌មានចុងក្រោយ



**១-**លោកស្រី ខេក ហ្គាឡាប្រ៊ូ (ប៉ុង ឈីវហ្គិច) ជាប្រធាន គ ជ ប

លោកស្រី ខេក ហ្គាឡាប្រ៊ូ នាមដើម ប៉ុង ឈីវហ្គិច បានទទួលការគាំទ្រ ពីគណបក្សប្រជាជន និងគណបក្សសង្គ្រោះជាតិ ជាសមាជិកទី៩នៃ គ ជ ប មកពីស្ថាប័នឯករាជ្យរួច ហើយ ។



**២-** លោក សម រង្ស៊ី នឹងក្លាយជាតំណាងរាស្ត្រ

លោក សម រង្ស៊ី នឹង ចូលជាសមាជិកសភា ទៅ ជំនួសតំណាងរាស្ត្រ កុយ ប៊ុនរឿង ដែលនឹងទៅជា សមាជិក គ ជ ប ។រីឯសមាជិក សភា៨រូប មកពីគណបក្សនយោបាយទាំងពីរនឹង ត្រូវបង្ហាញនៅពេលអនុម័តច្បាប់គ ជ ប ថ្មី ៕

# Connect with over 20,000 residents in Lowell!



Soben Pin, Managing Partner




KhmerPost USA - Your portal to the 2nd largest Cambodian-American population in the United States

Free Full Color Biweekly Bilingual Cambodian-American Newspaper available over 100 locations serving Greater Lowell, Lynn, Boston and beyond.

**Call 978-677-7163** for a free quote today!







KhmerPost USA | 45 Merrimack St., Suite 218A | Lowell, MA, 01852
Phone: 978.677.7163 | Fax : 978-677-7092
www.khmerpost.us | Info@khmerpost.us

# សាគូ សាម៉ុត

# ប្រវត្តិសាស្ត្រកម្ពុជា និង អរិយធម៌ខ្មែរ

តពីលេខមុន

## ផែនទីរដ្ឋបាលនិងបណ្តាញផ្លូវថ្នល់នៃប្រទេសកម្ពុជា




| | | | | | |
|---|---|---|---|---|---|
| ភ្នំពេញទៅក្រុងបាត់ដំបង | ២៩១គម | ភ្នំពេញទៅក្រុងក្រចេះ | ៣៤០គម | ភ្នំពេញទៅក្រុងខេមរភូមិន្ទ | ៣៨០គ៖ |
| ភ្នំពេញទៅក្រុងសៀមរាប | ៣១៤គម | ភ្នំពេញទៅក្រុងស្ទឹងត្រែង | ៥៥១គម | ភ្នំពេញទៅក្រុងព្រះសីហនុ | ២២៦គ៖ |
| ភ្នំពេញទៅក្រុងសំរោង | ៥៥៣គម | ភ្នំពេញទៅក្រុងបានលុង | ៥៨៣គម | ភ្នំពេញទៅ ក្រុងកែប | ១៧៥គ៖ |
| ភ្នំពេញទៅក្រុងស្ទឹងសែន | ១៦៩គម | ភ្នំពេញទៅសែនមនោរម្យ | ៣៧៥គម | ភ្នំពេញទៅ បូគោ | ១៩០គម |
| ភ្នំពេញទៅក្រុងព្រះវិហារ | ៣២៩គម | ភ្នំពេញទៅក្រុងព្រៃវែង | ៩១គម | ភ្នំពេញទៅ គិរីរម្យ | ១១៧គ៖ |
| ភ្នំពេញទៅក្រុងពោធិសាត់ | ១៨៦គម | ភ្នំពេញទៅក្រុងស្វាយរៀង | ១២៥គម | ភ្នំពេញទៅក្រុងសិរីសោភ័ណ | ៣៧១គ៖ |
| ភ្នំពេញទៅក្រុងកំពង់ឆ្នាំង | ៩១គម | ភ្នំពេញទៅក្រុងច្បារមន | ៥៥គម | ភ្នំពេញទៅ ក្រុងតាខ្មៅ | ១៥គម |
| ភ្នំពេញទៅក្រុងកំពង់ចាម | ១២៥គម | ភ្នំពេញទៅក្រុងដូនកែវ | ៧៥គម | ភ្នំពេញទៅក្រុងប៉ោយប៉ែត | ៥០៦គ៖ |
| | | ភ្នំពេញទៅក្រុងកំពត | ១៥៨គម | ធំហ៊ៃផ្ទៃ: ១៨១ ០៣៥ គម² | |

## បឹងទន្លេសាបមាន បឹងធំ បឹងតូច និងវាលភក់







តទៅលេខក្រោយ

## តមកពីទំព័រទី ២០ ហេតុអ្វីបានជាក្មេងយកឡាម...

អារម្មណ៍ថា គេនៅក្នុងក្រុមអ្វីសំខាន់របស់គេមួយ ។ ការដាក់ទារុណកម្មរាងកាយខ្លួនឯង គឺជាវិធីកាត់បន្ថយអារម្មណ៍ឈឺចាប់អារម្មណ៍ខកចិត្តអារម្មណ៍មិនសប្បាយចិត្ត ឬអារម្មណ៍ស្រងូតស្រងាត់ ។ ភាគច្រើនក្មេងដែលអារ.សាច់ខ្លួនឯងមានបញ្ហាមិនចង់ញ៉ាំបាយ ។ ក្មេងភាគច្រើនធ្លាប់មានការរំលោភលើរាងកាយធ្លាប់មានការធ្វើទារុណកម្មរាងកាយ ឬក៏មានទារុណកម្មផ្លូវចិត្ត ឬត្រូវបានគេជេរស្តីបន្ទោសច្រើននៅពីក្មេង ។

ក្មេងជំពូកនេះភាគច្រើនធាប់មានការអាក់អន់ចិត្តច្រើន ជាមនុស្សធ្វើអ្វីប្រយ័ត្នផ្ចិតផ្ចង់មិនចង់ឱ្យខុសឡើយ ជាក្មេងចូលចិត្តធ្វើអ្វីលើសគេ មិនចូលចិត្តចាញ់គេ ។ ការធ្វើបាបរាងកាយដូចជាការអារ.សាច់ខ្លួន គឺជារនាំងការពារ បាំងការឈឺចាប់អ្វីមួយដែលកើតមានក្នុងជីវិតគេ ឬរឿងអ្វីមួយដែលកើតឡើងក្នុងរង្វង់គ្រួសារគេ ។

អ្វីដែលគេធ្វើមិនបានក្នុងជីវិតគេ, ការដាក់ទារុណកម្មអារ.សាច់ខ្លួន គឺជាក្បួនឱ្យមានការគ្រប់គ្រងអំណាចចិត្ត ឬឥទ្ធិពលចិត្តមកវិញ ។ ការធ្វើទារុណកម្មអារ.សាច់ខ្លួនឯងក៏ជាសញ្ញារោកចិត្តវង្វេងចិត្តពីរ. រោគព្រួយចិត្តខ្លាំង រោគចិត្តពីរមិនប្រក្រតីខ្លាំង និងរោគរលាកខួរក្បាល ។

ប៉ុន្តែយើងក៏ដឹងថា ក្មេងដែលអារ.សាច់ដាក់ទារុណកម្មខ្លួន គឺជាក្មេងធម្មតាហើយភាគច្រើនជាក្មេងជំទង់កំពុងតែចង់ដឹងថា ខ្លួនគេជានរណា ។ ការលូតលាស់ ឬការធំដឹងក្តីការពេញវ័យរបស់ក្មេង គឺចូលដំណាក់កាលស្មុគស្មាញអ្វីមួយៗ ។

នេះគឺជាដំណាក់កាលចង់សាកល្បងអ្វីៗដូចជាប្រើគឿងញៀន និងធ្វើអ្វីដែលមានគ្រោះថ្នាក់បំផុត ចាស់ៗបូរាណតែងតែប្រើពាក្យថា "ក្មេងឈាមរាវ"។ ក្មេងធ្វើអត្តឃាតខ្លួនក៏មានអត្រាខ្ពស់ដែរ ក្នុងដំណាក់ការពេញវ័យជំទង់នេះ ។

សម្រាប់ក្មេងដែលមានវិបត្តិផ្លូវ ឬបញ្ហារោគចិត្តញវិញ ការដាក់ទារុណកម្មរាងកាយខ្លួនឯង គឺជាការញៀវមួយដូចជាអារ.សាច់ គឺហាក់បីដូចជាក្មេងប្រើគ្រឿងញៀនសេពកាម ញៀនល្បែង និងញៀនបារី ។ល។

ខ្ញុំសង្ឃឹមថា អត្ថបទនេះអាចជួយឆ្លុះបញ្ចាំងខ្លះៗឱ្យអ្នកបានយល់អំពីក្មេងដែលប្រព្រឹត្តអំពើអារ.សាច់ខ្លួនឯង ។ ខ្ញុំសង្ឃឹមថា អ្នកនិងរកវិធីជួយគេមិនស្អប់ខ្ពើមគេ ឬបន្ទោសគ្នាចេះអាណិតគ្នា និងសន្តោសប្រណីគ្នាមិនស្តីបន្ទោសគ្នាបន្ថែម ហើយរកអ្នកបច្ចេកទេសជំនាញខាងចិត្តសាស្ត្រជួយគ្នានៅពេលដែលគ្នាកំពុងត្រូវការជួយ ៕



# ជោគជតារាសីលោកអ្នក ទាំង១២ ប្រចាំឆ្នាំរោង

## ឆ្នាំជូត



រាល់កិច្ចការដែលលោកអ្នកប៉ងប្រាថ្នាជាយូរមក ហើយនោះក្នុងរយៈពេលនេះ គឺបានសមដូចបំណង ហើយគ្មានអ្វីមករារាំងនោះទេ ហើយរាល់ការប៉ងឃាយីពីមនុស្សដែលមានបំណងមិនល្អមកលើលោកអ្នកនោះក៏មិនបានសម្រេចដែរ ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញអាចពង្រីកអាជីវកម្មឱ្យធំបន្ថែមទៀតបាន ។ ឯបញ្ហាស្នេហាគូស្វាមីភរិយាមានភាពសុខដុមរមនាគ្មានផលរមាស់អ្វីឡើយ ៕

## ឆ្នាំឆ្លូវ



លោកអ្នកអាចនឹងមានអារម្មណ៍ច្របូកច្របល់បន្តិចនៅក្នុងរយៈពេលនេះ ព្រោះកិច្ចការដែលថា នឹងទទួលបានផលល្អនោះ វាអាចមានការប្រែប្រួលដោយសារតែមានការរំខានពីអ្នកដទៃ ។ បើចំពោះអ្នកប្រកបមុខរបររកស៊ីជួញដូរវិញ អាចរកផលកម្រៃគ្រាន់ បើគួរជាទីគាប់ប្រសើរជាងមុន ។ រីឯបញ្ហាស្នេហាពុំមានផលរមាស់អ្វីនោះឡើយ ៕

## ឆ្នាំខាល



លោកអ្នកមានភ័ព្វសំណាងល្អក្នុងការងារទទួលរឿងឡើងតួនាទី ឬប្រាក់បៀវត្សរ៍បន្ថែម ។ ជាងនេះទៀតនោះប្រសិនបើចង់ពឹងពាក់អ្នកមានយសស័ក្តិខ្ពង់ខ្ពស់ក្នុងរឿងអ្វីមួយនឹងបានដូចបំណងផងដែរ ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញ អាចរកប្រាក់ចំណូលចិញ្ចឹមគ្រួសារបានដោយស្រួលទេ មិនមានអ្វីមករាំងស្ទះឡើយ ។ រីឯបញ្ហាស្នេហាគូស្នេហ៍រមែងចេះអត់ឱនឱ្យគ្នា ៕

## ឆ្នាំថោះ



រាល់ការស្មុគស្មាញដែលធ្លាប់កើតមានលើលោកអ្នកក្នុងពេលនេះ នឹងត្រូវអហោសិកម្មទាំងអស់ ហើយទ្រព្យដែលរបូតចេញពីដៃទៅនឹងវិលត្រឡប់មកវិញយ៉ាងគ្រប់គ្រាន់ ។ ចំពោះអ្នកប្រកបមុខរបររកស៊ីជួញដូរវិញ ត្រូវគិតគូរឱ្យបានច្បាស់លាស់មុននឹងដាក់ទុនថ្មី ទើបមិនខាតបង់រាល់ការចំណាយទាំងនោះ ។ រីឯបញ្ហាស្នេហាត្រូវចេះពូនជ្រោយចំណងស្នេហាដោយមានភាពផ្អែមល្ហែម ទើបជាការប្រសើរ ៕

## ឆ្នាំរោង



លោកអ្នកនឹងទទួលបាននូវលាភសក្ការៈពីភាគហ៊ុនរកស៊ី និងមិត្តរួមការងារយ៉ាងច្រើនគួរឱ្យពេញចិត្ត ។ លើសពីនេះទៅទៀតគម្រោងការដែលបានត្រៀមទុកនឹងបានសម្រេចដូចបំណងទៀតផង ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញ គួរជួញដូរនៅទីជិតៗទើបសមប្រកប ។ រីឯបញ្ហាស្នេហាគូស្នេហ៍ចេះស្តាប់ឱវាទគ្នា ៕

## ឆ្នាំម្សាញ់



អាចពោលបានថា លោកអ្នកមានសេចក្តីសុខក្នុងជីវិត និងការងារ ព្រោះវិបត្តិ និងភាពស្មុគស្មាញដែលមានកន្លងមកក៏បានធូរស្រាលឡើងវិញមួយកម្រិតផងដែរ ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញ ទោះបីជាចេញទៅជួញដូរនៅទីណាក្តី គួរចៀសវាងការដាក់ទុនថ្មី ព្រោះអាចនាំឱ្យខាតបង់ ។ រីឯបញ្ហាស្នេហាគូស្នេហ៍ច្រើនប្រចណ្ឌខុសរឿង ៕

## ឆ្នាំមមី



រាល់ការបំពេញការងាររបស់លោកអ្នកក្នុងរយៈពេលនេះសុទ្ធតែផ្តល់នូវអត្ថប្រយោជន៍ គួរឱ្យជាទីពេញចិត្តទាំងអស់គ្មានអ្វីមករាំងស្ទះឡើយ ហើយជាងនេះទៀត នោះគម្រោងការដែលបានត្រៀមទុកជាយូរមក ហើយក៏នឹងបានសម្រេចផងដែរ ។ បើជាអាជីវកររកស៊ីវិញ មានការរីកចម្រើនលូតលាស់ទៅមុខជាលំដាប់ ។ រីឯបញ្ហាគូស្នេហ៍ច្រើនយល់ចិត្តគ្នា និងនឹករលឹកគ្នា បើនៅឆ្ងាយ ៕

## ឆ្នាំមមែ



លោកអ្នកគួរប្រុងប្រយ័ត្នចំពោះការនិយាយស្តីបន្តិច ពីព្រោះអាចនឹងមានគូសត្រូវចាំចាប់ទោសកំហុសមួលបង្កាច់បង្ខូចកេរ្តិ៍ឈ្មោះរបស់លោកអ្នកឱ្យប្រែក្លាយទៅជាស្មុយអសោចិ៍ ។ សម្រាប់អ្នកប្រកបមុខរបររកស៊ីជួញដូរវិញមានក្រុមមនុស្សតាមឈ្នានីសច្រើន ដូចច្នេះត្រូវប្រយ័ត្នបន្តិចចៀសវាងការបរាជ័យ ។ រីឯបញ្ហាស្នេហាមានភាពចម្រូងចម្រាសដាក់គ្នាបន្តិចបន្តួច ៕

## ឆ្នាំវក



ក្នុងរយៈពេលនេះលោកអ្នកជួបនឹងបញ្ហាខាងផ្លូវចិត្តមិនសូវជាសប្បាយរីករាយប៉ុន្មាននោះទេ តែប្រសិនបើចង់ទទួលផលពីការងារនោះ ចូរធ្វើចិត្តឱ្យត្រជាក់ ទើបបានសម្រេចដូចបំណង ។ បើជាអ្នកប្រកបរបររកស៊ីជួញដូរវិញ គឺមានការប្រទាំងប្រទើសជាមួយអ្នកមានមុខរបរដូចគ្នា ដូច្នេះគួរបើកចិត្តឱ្យទូលាយ ។ រីឯបញ្ហាស្នេហាមានការកាំចិត្ត ព្រោះតែម្នាក់ៗចង់ចាញ់ឈ្នះគ្នានោះឯង ៕

## ឆ្នាំរកា



រាល់កិច្ចការសព្វបែបយ៉ាងលោកអ្នកអាចជួបនឹងបញ្ហាខ្លះៗ នាគ្រាដំបូង ប៉ុន្តែក្រោយមកមិនមានអ្វីជាឧបសគ្គរារាំងទៀតឡើយ ។ ចំពោះអ្នកប្រកបមុខរបររកស៊ីជួញដូរវិញ មានការទិញចូលលក់ចេញគ្រាន់ បើអាចរកផលកម្រៃត្រឡប់មកផ្ទះវិញ យ៉ាងត្រជាក់ចិត្ត ។ រីឯបញ្ហាស្នេហាមានភាពផ្អែមល្ហែម និងស្រស់ស្រាយប្រៀប ដូចត្រីក្នុងទឹកនារដូវខែវស្សាដូច្នេះដែរ ៕

## ឆ្នាំច



រាល់ការបំពេញការងារទាំងឡាយលោកអ្នកមិនមានបញ្ហាអ្វីចោទនោះទេ ប៉ុន្តែក្នុងនោះ សូមប្រយ័ត្នកុំយកអាសាមនុស្សសម្បុរសឱ្យសោះ ព្រោះនាំឱ្យកើតរឿងសៅហ្មងទៅថ្ងៃក្រោយ ។ សម្រាប់អ្នកប្រកបមុខរបររកស៊ីជួញដូរវិញ អាចសន្សំទុកបានខ្លះ ។ រីឯបញ្ហាស្នេហាចូរកុំយកភាពមានះចង់ចាញ់ឈ្នះប្រយ័ត្នកើតមានជម្លោះវិវាទឈានដល់ការប្រេះស្រាំ ៕

## ឆ្នាំកុរ



នៅក្នុងរយៈពេលនេះ លោកអ្នកទទួលលាភសក្ការៈពីសាច់ញាតិបងប្អូនដែលជិតស្និទ្ធ ។ ក្រៅពីនោះក៏នៅទទួលបានដំណឹងល្អដែលមានប្រយោជន៍ដល់ជាតិ និងការងាររបស់លោកអ្នកតទៅអនាគតទៀតផង ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញផលកម្រៃទទួលបានកាក់កបគ្រាន់បើតែហាមកុំជួញដូរផ្លូវឆ្ងាយប្រយ័ត្នមានបញ្ហាដល់ខ្លួន ។ រីឯបញ្ហាស្នេហាគូស្នេហ៍អាចមានការរកាំរកូសគ្នាខ្លះ ប៉ុន្តែមិនធ្ងន់ធ្ងរនោះទេ ៕

# កម្មវិធីរដូវក្ដៅនៅ បិយ និង ហ្គើលក្លឹប

# Summer Programs at Boys and Girls Club

កុមារ៣០០នាក់ មកកំសាន្តរៀងរាល់ថ្ងៃនៅបិយ និង ហ្គើលក្លឹបនារដូវក្ដៅនេះដោយគ្រាន់តែបង់ $១៥ ក្នុង១អាទិត្យ កុមារអាចចូលរួមក្នុងកម្មវិធីនឹងមានអាហារពេលព្រឹកនិងពេលថ្ងៃសម្រាប់ហូបរួចជាស្រេច ។ នៅមានទៀតសូមអ្នកអានអត្ថបទជាភាសាអង់គ្លេស ។



More than 300 youth ages 7-18 are having fun at the Boys & Girls Club of Greater Lowell each day this summer. For just $15 a week, they are enjoying breakfast and lunch, including the popular Friday BBQ's. Members earn trips to the movies by completing book reports, take part in robotics and other science based programming as well as utilize technology to have fun while keeping their brains sharp for the school year. They get to explore their creative side through art (including a partnership with the Whistler House), digital arts and music classes. Youth have fun and stay fit through basketball, soccer, double dutch, group games and trips to the park. There is still time to join. The summer program runs through August 20th and the school year program-just $26 for the whole school year-begins August 26. Contact Gloria Morales at the Club for more information or to register at 978-458-4526 x 22 or gmorales@lbgc.org.

Accepting New Patients

# មជ្ឈមណ្ឌលពេទ្យ និងទទួលព្យាបាល ស៊ី ប៊ី ស៊ី

## CBC Medical & Walk-In Center

Serving the Lowell Community for over 20 years!

Mon - Fri 8AM-4PM. 1st & 3rd Sat: 8AM-NOON. 978-454-9703

AT NEW LOCATION
ចាប់បើកហើយ

ទទួលអ្នកជំងឺថ្មី

**Services:**

- In House Lab & Blood Work
- Immunizations
- Physical Exams
- Emergency Room Follow-Ups
- Nebulizer & Asthma Treatments

- EKG Testing
- Wellness & Preventative Care
- Workers Comp Medical Treatment
- DOT Physicals
- Walk-Ins for Illness & Minor Injury

**Primary Care & Urgent Care Services**
ពេទ្យគ្រួសារ និងសង្គ្រោះបន្ទាន់

- ពិនិត្យឈាមនៅមន្ទីរពិសោធន៍ក្នុងមជ្ឈមណ្ឌល
- ចាក់វ៉ាក់សាំងការពារ
- ពិនិត្យរាងកាយ
- តាមដានពិនិត្យនៅបន្ទប់ព្យាបាលបន្ទាន់
- ហឺតហាត់ផ្ទៃកដកដង្ហើម

- ថតចលនាបេះដូង
- ថែទាំសុខភាពទូទៅសម្រាប់គ្រួសារ
- ទទួលព្យាបាលអ្នកទទួលគ្រោះថ្នាក់នៅកន្លែងធ្វើការ
- ពិនិត្យនិងផ្តល់លទ្ធផលបញ្ជាក់ដើម្បីទទួលសិទ្ធ
- អាចពិនិត្យពេលឈឺ និងគ្រោះថ្នាក់ដោយមិនបាច់ណាត់ជួប

**Cambodian Speaking Staff** (បុគ្គលិកនិយាយភាសាខ្មែរ)

**យើងខ្ញុំមានសេចក្តីសោមនស្សរីករាយជម្រាបជូនលោកអ្នក**
**យើងខ្ញុំនឹងផ្លាស់ទៅទីតាំងថ្មី**
នៅផ្ទះ 16 Pine St Unit #5 Lowell, MA 01851
នាថ្ងៃទី 21 កក្កដា ឆ្នាំ 2014

សូមអញ្ជើញចូលរួមមកជួបគ្នានៅ តូបរបស់យើងខ្ញុំ
នៅក្នុងពិធីបុណ្យអុំទូកអាស៊ីអគ្នេយ៍
នាថ្ងៃទី ១៦ សីហា ឆ្នាំ ២០១៤



សូមថ្លែងអំណរគុណ ដល់អធិបតី និងភ្ញៀវកិត្តិយសទាំងអស់ ដែលបានចូលរួមក្នុងពិធីកាត់ខ្សែបូរណ៍ និងសូត្រមន្ត កាលពីថ្ងៃទី ២៣ កក្កដា ២០១៤ ។ អរគុណ ជាពិសេសដល់លោក រដ្ឋា យ៉ែម និង កុងស៊ុលកិត្តិយសនៃព្រះរាជាណាចក្រកម្ពុជា ដែលបានមានវត្តមានផងដែរ ។




**CALL TO MAKE AN APPOINTMENT TODAY**
(សូមទូរស័ព្ទដើម្បីណាត់ជួប)

**978-454-9703**

# 16 Pine Street Unit #5 Lowell, MA 01851